# ខ្មែរប៉ុស្តិ៍ ស.រ.អា

# KhmerPost USA

Printing The Cambodian World News

VOL. 05 ISSUE 76 . JAN. 28th – FEB.10th, 2010

សុបិន : (267) 253-3947, សែម : (781) 244-0522

MASSACHUSETTS
- LOWELL
- LYNN
- REVERE
- BOSTON
PENNSYLVANIA
RHODE ISLAND
NEW JERSEY


អត្ថបទក្នុងលេខនេះ ទំព័រ



# ទិវាម៉ាតាំង លូធ័រឃីង

**ហ្វីឡាដែលហ្វៀ :**

នាថ្ងៃឈប់សម្រាកនៃទិវាដ៏ត្រជាក់ រំលឹកដល់វិរបុរសស្បែកខ្មៅ ម៉ាតាំង លូធ័រ ឃីង សហគមន៍ខ្មែរអាស៊ី-អាមេរិកាំងខ្មៅ និងឡាទីណូ ពុំបានសម្រាកដូចគេឯងទេ ។ នាថ្ងៃច័ន្ទទី ១៧ ខែមករា ឆ្នាំ២០១១ មនុស្សប្រមាណ ១០០០នាក់ បានណាត់គ្នាដង្ហែក្បួនពីមុខសាលាក្រុងហ្វីឡាដែលហ្វៀ សំដៅទៅវិមានតុលាការអន្តប្រវេសន៍ ដែលស្ថិតនៅជ្រុងផ្លូវកាឡូហ៊ិល និង ១៨ ។

(តទៅទំព័រទី ០២)




# Asian Man Found Dead in the Sand Covered Snow

**រីវែរ :** យុវជនអាស៊ីម្នាក់ បានត្រូវគេរកឃើញស្លាប់កប់នៅក្នុងគំនរព្រិល កាលពីថ្ងៃទី១៩ ខែមករា ឆ្នាំ២០១១ នេះវេលាម៉ោង៨កន្លះព្រឹកនៅខាងត្បូងទីងូតទឹកមួយដែលស្ថិតនៅតាមបណ្តោយផ្លូវ Ocean នៃឆ្នេរសមុទ្រក្រុងរីវែរ ។


អគ្រេ ជា

អ្នកនាំពាក្យនៃប៉ូលិសរដ្ឋ បាននិយាយថា "សពនោះជាជនជាតិអាស៊ី អាយុប្រមាណ ២០ឆ្នាំ" កំពុងរង់ចាំការស៊ើបអង្កេតបន្ថែម និងសាកសួរគ្រួសារ ។ នៅថ្ងៃទី២១ ខែមករា **អគ្រេ ជា** បានទទួលសេចក្តីរាយការណ៍របស់ប៉ូលិស ហើយរាយការណ៍ជាភាសាអង់គ្លេសតាមអ្នកនាំពាក្យ ជេក វ៉ាក ថាសពយុវជនឈ្មោះ ហួន ផាន អាយុ២៣ ឆ្នាំ រស់នៅ ORLANDO រដ្ឋ FLORIDA ធ្លាប់ធ្វើយោធា MARING អាមេរិកាំង ។ គេពុំទាន់ដឹងនៅឡើយថា ហេតុអ្វីបានជាមកស្លាប់នៅ រីវែរ ទៅវិញ ហើយក៏ពុំមានសញ្ញាគួរឱ្យសង្ស័យថា មានអំពើទុច្ចរិតលើយុវជននោះទេ ៕

*Staff Writer: Audria Chea*

Revere, MA –On January 19, 2011 the office of Suffolk County District Attorney Daniel F. Conley sent out a release stating "Revere Beach Death Under Investigation."

The body of a deceased was spotted by a passerby on January 19 at about 8:30 a.m. behind the South Bath House along Revere Beach Boulevard. According to Boston Globe the body was discovered "partially buried in a snowbank…the man's sneaker -clad foot was visible sticking out of the snow." The body was said to be found slumped against the Bathhouse, facing the water.

State Police responded to the report first then assigned to Suffolk County District Attorney's Office as a lead investigator. Jake Wark, a spokesman for Conley stated, "The remains are of those of an Asian male believed to be in his early 20s." Investigators have only made tentative identification on the deceased and were waiting to confirm from the closest family member on the discovery of the remains. *(Continued to page02)*

(Continued from page 01 )

# Asian Man Found Dead.....

Cambodian Reverians whose community is concentrated along the Shirley Avenue that runs through and connected with Ocean Avenue and Revere Beach Boulevard, by Revere Massachusetts General Hospital are unaware of the identity of the deceased person. One community member commented, "This is too close to home. Some one has to know something about this person."

A pick up truck was used to shroud removal of the body. "There were no signs of blood or obvious foul play at the scene." said Wark, spokesman for the DA's Office. He also reported, "The body was transferred to the Office of the Chief Medical Examiner for an autopsy." On Friday January 21 Wark reported, "The cause of death is undetermined pending further tests, but the preliminary autopsy confirmed there is no suspected of "foul play".

Among investigators from the DA Office, State Police Detective Unit, which has "Jurisdiction" over all death investigation in Chelsea, Revere, and Winthrop, and members of the State Police Crime Scene Services Section and Uniformed troopers were also responded to the discovery of the remains on January 19, 2011.

On Friday January 21, 2011 DA Office spokesman, Jake Wark confirmed the identification of the deceased man as Huan Phan 23, last known address was in Orlando Florida. Wark reported Phan's family used to live in Revere. He is unable to confirm the current location of Phan's family, but said investigators are trying to find out when Phan, who served in the US Marine Corps, came to Revere and why.

# រ៉ូដអែឡិន្ត : សមាគមខ្មែរអាណត្តិថ្មីប្រឈមមុខនឹងអ្វីខ្លះ?

ដោយៈ សុវណ្ណ ហេង

សមាគមខ្មែរនៅរដ្ឋរ៉ូដអែឡិន្ត អាណត្តិថ្មីឆ្នាំ ២០១១ របស់លោក កែវ សំណាង ទទួលបន្ទុកដ៏ធំមួយ នោះគឺបំណុលដែលបន្សល់ទុកពីអាណត្តិឆ្នាំ ២០០៩។

បើតាមសំដីរបស់លោក ឡាក់ ស៊ុម អនុប្រធានសមាគមខ្មែរបច្ចុប្បន្ន បានរៀបរាប់ឱ្យដឹងថាៈ "សមាគមខ្មែរនៅក្នុងអាណត្តិនេះគឺទទួលថ្នបាក់ដ៏ធំមួយ ដោយសមាគមត្រូវរកថវិកាយ៉ាងហោចណាស់ឱ្យបាន ៥០០០ដុល្លារសហរដ្ឋអាមេរិក ដើម្បីសងបំណុលជូសអាណត្តិមុន (ឆ្នាំ២០០៩) ដែលគាត់ជំពាក់ប៉ូលិសក្រុង គ្រែនស្តុន ចំនួន ៣៩០៧ដុល្លារ ក្នុងពេលដែលគាត់ចាត់កម្មវិធីបុណ្យចូលឆ្នាំប្រពៃណីខ្មែរកាលពីឆ្នាំមុន"។


លោក ឡាក់ ស៊ុម

កាលពីថ្ងៃអង្គារ៍ ទី១៨ ខែមករា ឆ្នាំ ២០១១ លោកប្រធានសមាគម កែវ សំណាង និងអនុប្រធានលោក ឡាក់ ស៊ុម ព្រមទាំងលោក សាយ សារ៉ាត់ ប្រធានផ្នែកការងារបានទៅជួបមេប៉ូលិសក្រុងគ្រែនស្តុន ហើយបានមានប្រសាសន៍ថាៈ បើសិនណាជាសមាគមមិនសងប្រាក់ចំនួន ៣៩០៧ដុល្លារ ដែលជំពាក់ពីមុននោះទេ គឺគេនឹងមិនអនុញ្ញាតឱ្យមានការរៀបចំកម្មវិធីបុណ្យចូល ឆ្នាំខ្មែរសំរាប់ឆ្នាំ២០១១ នៅក្នុងទីក្រុងគ្រែនស្តុននោះទេ។ កន្លងមកសមាគមតែងតែដាក់ប្រាក់កក់ទុកកន្លែងសំរាប់រៀបចំកម្មវិធីបុណ្យចូលឆ្នាំខ្មែរជារៀងរាល់ឆ្នាំ ហើយបានតាមសំដី


អ្នកស្រី ញ៉ូរ សារ៉ាត

របស់អ្នកស្រី ទិត សារិន អតីតអគ្គលេខាធិការសមាគមខ្មែរក្នុងអាណត្តិឆ្នាំ២០០៩ បានប្រាប់ដល់សមាជិកគណៈកម្មការសមាគមនៅទីសាធារណៈ គឺកន្លែងបោះឆ្នោតកាលពីថ្ងៃទី២ ខែមករា ឆ្នាំ២០១១ កន្លងទៅនេះថាៈ គាត់បានកក់ប្រាក់ចំនួន ៥០០ដុល្លាររួចរាល់ហើយសំរាប់កន្លែងរៀបចំកម្មវិធីបុណ្យចូលឆ្នាំនោះ ក៏ប៉ុន្តែនៅពេលដែលគណៈកម្មការសមាគមថ្មី គឺអ្នកស្រី ញ៉ូរ សារ៉ាត បានទាក់ទងទៅកន្លែងនោះ គេបានប្រាប់ថាៈ គេមិនបានទទួលប្រាក់កក់ពីអ្នកស្រី ទិត សារិន នោះទេ។ លោក ឡាក់ ស៊ុម បានបង្ហើបប្រាប់ទៀតថា ខាងប៉ូលិសអស់ទំនុកចិត្តទៅលើសមាគមខ្មែរទៀតហើយ ដោយសារតែកន្លងមកខាងប៉ូលិសគេបានព្យាយាមទាក់ទងមកសមាគមតាមទូរស័ព្ទផង តាមអ៊ីម៉ែលផង អំពីរឿងជំពាក់លុយគេនោះ ប៉ុន្តែគេមិនបានទទួលការឆ្លើយតបពីខាងសមាគមវិញសោះ ហើយមិនត្រឹមតែប៉ុណ្ណោះ គេបានទៅដល់ការិយាល័យសមាគមទៀត ក៏ប៉ុន្តែមិនមានមនុស្សធ្វើការ។ ដូច្នេះសមាគមខ្មែរ ត្រូវរកថវិកាទាំងនោះ មកសងគេវិញសិន ទើបយើងអាចមានសិទ្ធិនឹងរៀបចំកម្មវិធីបុណ្យចូលឆ្នាំសំរាប់ឆ្នាំនេះ ហើយសមាគមគឺមិនមានលទ្ធភាពរកថវិកាយ៉ាងច្រើននេះក្នុងរយៈពេលដ៏ខ្លីបានទេ។

ដោយមានការយោគយល់ និងការស្រឡាញ់សង្គមខ្មែរ អំពីសំណាក់សមាជិកគណៈកម្មការទាំងអស់ក៏បានផ្តល់ប្រាក់ផ្ទាល់ខ្លួនមួយចំនួនដល់សមាគមខ្លះ ដោយខ្លះបានផ្តល់ ១០០០ដុល្លារ, ៥០០ដុល្លារ, ២០០ដុល្លារ និង១០០ដុល្លារជាដើម។ ហើយសមាគមត្រូវរកថវិកាចំនួន ១០០០ដុល្លារថែមទៀត គឺសម្រាប់ជួសជុលផ្ទះរបស់សមាគមមួយខ្នងនៅជាន់




ទី២ ឱ្យរួចរាល់ក្នុងពេលដ៏ខ្លីខាងមុខ ហើយដាក់ជួលដើម្បីរកបានប្រាក់ចំណូលបន្ថែមសំរាប់សមាគម ព្រោះថា នេះជាប្រភពប្រាក់ចំណូលដ៏សំខាន់ប្រចាំខែរបស់សមាគម។ លោក ឡាក់ ស៊ុម បានបន្ថែមថា "ខ្ញុំហាក់ដូចជាមិនយល់ទាល់តែសោះថា ក្រោមការគ្រប់គ្រងរបស់ក្រុមអាណត្តិមុន នៅក្នុងអាណត្តិមុន តើគាត់បានធ្វើអ្វីខ្លះ? តើមានមនុស្សប៉ុន្មាននាក់ធ្វើការជាមួយគាត់ ហេតុអ្វីបានជាអ្វីឱ្យសមាគមខ្មែរអាប់អោនដល់ថ្នាក់នេះ? សូម្បីតែផ្ទះមួយខ្នងដែលជាសម្បត្តិរួមតែមួយគត់របស់សមាគម ក៏គ្មានការជួសជុលអ្វីទាំងអស់ ក្រោយពីអ្នកជួលខ្មែរ នៅទីនោះបានចុះចេញ។ ម្យ៉ាងទៀតពីមុនៗមក គឺសមាគមមិនដែលមានការជំពាក់ប្រាក់គេក្នុងពេលរៀបចំកម្មវិធីបុណ្យចូលឆ្នាំទេ គឺមានតែទទួលបានប្រាក់ចំណេញ"។ ប៉ុន្តែលោក វ៉ែត សារិន ប្រធានចាស់របស់សមាគមខ្មែរ បាននិយាយកាលពីឱកាសបោះឆ្នោតនោះថាៈ "កាលដែលគាត់រៀបចំធ្វើកម្មវិធីបុណ្យចូល ឆ្នាំពេលនោះ គឺមានការខាតបង់ច្រើន" តែមិនបានបង្ហាញនូវឯកសារណាមួយឱ្យច្បាស់លាស់ថា គាត់បានទទួលប្រាក់ចំណូលប៉ុន្មាន និងចំណាយទៅអ្វីខ្លះនោះទេ។

អនុប្រធានសមាគមថ្មីមានជំនឿយ៉ាងមុតមាំថា ឆ្លងផុតឧបសគ្គមួយនេះ សមគមខ្មែរនៃរដ្ឋរ៉ូដនៃឡិន្ត នឹងមិនធ្វើឱ្យមានហេតុការណ៍បែបនេះកើតឡើងទៀតនោះទេ ហើយឥឡូវនេះគណៈកម្មការកំពុងតែមមាញឹកក្នុងការរៀបចំផែនការសំរាប់កម្មវិធីបុណ្យចូលឆ្នាំដែលនឹមកដល់ក្នុងប៉ុន្មានខែខាងមុខទៀតនេះ ហើយមួយចំនួនទៀតកំពុងមមារញឹកក្នុងការជួសជុលផ្ទះរបស់សមាគមឡើងវិញ៕

ទស្សនៈវិស័យ :
ដោយ : ម៉ម យ៉ឺន

# ខ្មែរយំស្ដាយព្រោះបាត់បង់ដីយួនរីករាយក្រៃព្រោះបានដីធំ



●●● ដោយយោងតាមប្រវត្តិសាស្ត្រប្រទេសកម្ពុជា គឺជាប្រទេសមួយក្នុងទ្វីបអាស៊ីភាគអគ្នេយ៍ (SOUTH EAST ASIA) ជាប្រទេសមានកំណត់បន្ទាត់ និងបង្គោលព្រំដែនដែលមានកំណត់ច្បាស់នៅលើផែនទីតំកល់ទុកនៅក្នុងប្រទេសកម្ពុជា នៅក្នុងអង្គការសហប្រជាជាតិ និងនៅក្នុងប្រទេសនីមួយៗ ដែលមានព្រំប្រទល់ជាប់គ្នា ដូចជា ប្រទេសវៀតណាម យួន ប្រទេសលាវ ប្រទេសថៃ សៀម ជាពិសេស នៅគ្រប់បណ្ណាល័យជាតិ នៅក្នុងប្រទេសមហាអំណាចធំៗទាំង៥ មានសហរដ្ឋអាមេរិក បារាំង អង់គ្លេស ចិន និងរុស្ស៊ីជាដើម។

ដោយយោងតាមផែនទីដែលបានបញ្ជាក់ជាក់លាក់ក្រោយពីប្រទេសកម្ពុជា ត្រូវបានយួនរឹបអូសយកទៅនៃដែនដីខ្មែរកម្ពុជាក្រោមចំនួន១២ខេត្ត និងប្រទេសសៀមរឹបអូសយកអស់១២ខេត្ត នៅក្នុងឆ្នាំ១៨៦៣។ ពេលនោះប្រទេសខ្មែរ ក្រោមការគ្រប់គ្រងនៃព្រមហាក្សត្រព្រះនាមព្រះបាទនរោត្តម បានធ្វើសន្ធិសញ្ញាដាក់ប្រទេសខ្មែរឱ្យទៅនៅក្រោមអាណាព្យាបាលរបស់ប្រទេសបារាំង ចុះថ្ងៃទី១១ ខែសីហា ឆ្នាំ១៨៦៣។

នៅក្នុងសន្ធិសញ្ញា ចុះថ្ងៃទី១១ ខែសីហា ឆ្នាំ១៩៦៣ ក្នុងមាត្រា១ មានសេចក្ដីថ្លែងថា ព្រះចៅអធិរាជនៃជនជាតិបារាំង នឹងផ្ដល់នូវការការពារដល់ព្រះរាជាខ្មែរ។ ក្នុងមាត្រាបន្តបន្ទាប់មកទៀត មានចែង ព្រះចៅបារាំងនឹងតែងតាំងរ៉េស៊ីដង់ម្នាក់ ដែលមានឋានៈជាមន្ត្រីខ្ពស់ឱ្យនៅអមព្រះរាជាខ្មែរ។ ឯព្រះរាជាខ្មែរ នឹងតែងតាំង រ៉េស៊ីដង់ខ្មែរម្នាក់ឱ្យទៅនៅអមលោកទេសាភិបាលនៃដែនដីកូសាំងស៊ីនវិញដែរ។

ដោយយោងតាមក្រោមពីប្រទេសខ្មែរ បានស្ថិតនៅក្រោមអាណាព្យាបាលភាពបារាំង ព្រឹត្តិការណ៍ជាច្រើនបានកើតឡើងរវាងអ្នកស្នេហាជាតិខ្មែរ ដូចជា អាចារ្យស្វា លោកពោធិ៍កំបោរ ក្រឡាហោមគង់ លោកគ្រូអាចារ្យ ហែម ជីវ លោក ប៉ាច ឈឺន លោក អ៊ុំតើស លោក ប៊ុនច័ន្ទម៉ុល និងវរជនស្នេហាជាតិជាច្រើនទៀត ដែលបានបះបោរប្រឆាំងនឹងអាណាព្យាបាលបារាំង។

ដោយសារតែពេលនោះ ព្រះរាជាខ្មែរសព្វព្រះទ័យប្រគល់ប្រទេសខ្មែរ ឱ្យទៅនៅក្រោមអាណាព្យាបាលភាពបារាំង ទើបបារាំងត្រូវតែជួយការពារ និងជួយទាមទារឱ្យប្រទេសសៀម ត្រូវតែប្រគល់ខេត្តទាំងអស់ ដែលសៀមបានកាន់កាប់ប្រគល់មកឱ្យខ្មែរវិញ។ ជាពិសេស បារាំងបានរៀបចំខ្សែបន្ទាត់ព្រំដែនរវាងប្រទេសទាំងអស់ ដែលស្ថិតនៅក្រោមអាណាព្យាបាលភាពបារាំង ដូចជា យួន លាវ និងជាមួយប្រទេសសៀម យ៉ាងត្រឹមត្រូវជាមួយប្រទេសគ្នា ដោយមានចុះហត្ថលេខាយល់ព្រមទទួលស្គាល់ទៅតាមកំណត់បង្គោល និងគំនូសខ្សែបន្ទាត់ទុកជាបានការត្រឹមត្រូវតាមច្បាប់អន្តរជាតិ។

ចំណែកទឹកដីខ្មែរ ចំនួន២១ខេត្ត នៅលើដែនដីខ្មែរកម្ពុជាក្រោម ក្រោយពីបារាំងបានមើលឃើញជនជាតិយួន គេបានចូលមករស់នៅ និងត្រួតត្រាយ៉ាងពេញទីទៅហើយ ទើបបារាំងបានសម្រេចដោយអត្តនោម័តប្រគល់ទឹកដី២១ខេត្ត ដែនដីកម្ពុជាក្រោមនេះទៅឱ្យយួនតែម្ដង នៅក្នុងឆ្នាំ១៩៤៩ ដោយពុំបានសុំសេចក្ដីយល់ព្រមពីព្រះរាជាខ្មែរឡើយ។

មុនពេលបារាំងប្រគល់ទឹកដី២១ខេត្តនេះទៅឱ្យយួន បារាំងបានធ្វើគំនូសផែនទីខ្សែបន្ទាត់ និងគោលសីមាព្រំដែនយ៉ាងត្រឹមត្រូវរួចជាស្រេចអស់ទៅហើយ ដោយមានអ្នកបច្ចេកទេស ជាអ្នកឯកទេសបារាំង ខ្មែរ និងយួន បានរួមគ្នាសម្រេចយល់ព្រមទៅតាមផ្លូវច្បាប់អន្តរជាតិ ថែមទាំងបានបញ្ជាក់ពីទំហំផ្ទៃក្រឡាពិតប្រាកដនៃផ្ទៃក្រឡាប្រទេសនីមួយៗ គូយ៉ាងដូចជាប្រទេសខ្មែរមានក្រឡាផ្ទៃចំនួន ១៨១.០៣៥ គីឡូម៉ែត្រក្រឡា (181,035km²) គឺជាតួលេខបញ្ជាក់យ៉ាងច្បាស់ថា ព្រំដែនខ្មែរបន្ទាត់ និងបង្គោលសីមាបានកំណត់ត្រឹមត្រូវជាស្រេចអស់ទៅហើយ។

ដូច្នេះផែនទី ដែលបានបង្កើតឡើងនៅក្នុងអាណាព្យាបាលភាពបារាំង ហើយបានការទទួលស្គាល់ពីគ្រប់ប្រទេសនៅជុំវិញប្រទេសខ្មែរនោះ ហើយដែលបានយកមកភ្ជាប់ជាមួយសន្ធិសញ្ញាអន្តរជាតិនានា នៅពេលធ្វើសន្និសីទអន្តរជាតិម្ដងៗ ស្ដីពីប្រទេសកម្ពុជា ដូចជាសន្ធិសញ្ញាអន្តរជាតិនៅក្រុងហ្សឺណែវ ប្រទេសស្វីស នាឆ្នាំ១៩៥៣ និង១៩៥៤នោះ។

ដោយយោងតាមសន្ធិសញ្ញាអន្តរជាតិនៅក្រុងប៉ារីស ប្រទេសបារាំង ស្ដីពីការបញ្ចប់សង្គ្រាម និងបង្រួបបង្រួមជនជាតិខ្មែរ ឱ្យបានចូលមកប្រទេសខ្មែរវិញ ហើយធ្វើការបោះឆ្នោតសកលជ្រើសរើសមេដឹកនាំថ្មី នៅក្រោមការរៀបចំ និងការត្រួតពិនិត្យនៃអង្គការសហប្រជាជាតិ ឱ្យសមស្របទៅតាមគោលការណ៍លទ្ធិប្រជាធិបតេយ្យសេរីពហុបក្ស ដែលមានគូភាគីបដិបក្សទាំងអស់បានព្រមព្រៀងគ្នាចុះហត្ថលេខានៅពេលចេញសន្ធិសញ្ញាអន្តរជាតិ ព្រមទាំងប្រទេសចំនួន ១៨ បានចូលរួមជាសាក្សីផងដែរ។

ដូច្នេះ នៅពេលនេះម្ដងទៀត ផែនទីដដែលនេះនៅតែជាភស្តុតាងពេញលក្ខណៈច្បាប់ដដែលដែរ ដែលមានផ្ទៃក្រឡាប្រទេសខ្មែរចំនួន ១៨១.០៣៥ គីឡូម៉ែត្រក្រឡាជាពិតប្រាកដ។

ដោយយោងតាមសន្ធិសញ្ញាអន្តរជាតិ អមដោយកិច្ចព្រមព្រៀងដែលបានចុះអហ្គលេខាយល់ព្រមពីតំណាងប្រទេសខ្មែរ ប្រទេសយួន ប្រទេសលាវ និងប្រទេសសៀម ព្រមទាំងប្រទេសចំនួន១៨ ធ្វើជាកសិណសាក្សីផង ប្រទេសទាំងអស់នេះត្រូវតែគោរពតាមឱ្យបានសមស្របទៅតាមសច្ចាប័ន ដែលប្រទេសនីមួយៗ បានទទួលស្គាល់ និងយល់ព្រមជាផ្លូវការនោះដែរ។

ចំណែកលោកនាយករដ្ឋមន្ត្រីខ្មែរ លោកបានថ្លែងប្រកាសទទួលស្គាល់ជាញឹកញាប់ថា ទំហំផ្ទៃក្រឡាប្រទេសកម្ពុជាមាន : ១៨១.០៣៥ គីឡូម៉ែត្រក្រឡា ដែលជាផ្ទៃក្រឡា ត្រូវតែមានតួលេខត្រឹមត្រូវជាក់ស្ដែង មិនគ្រាន់តែនិយាយនោះទេ។ ប៉ុន្តែតួលេខនៅលើទឹកដីភូមិសាស្ត្រពិតប្រាកដ សួរថា : តើដឹងថាមានចំនួនគ្រប់ត្រឹមត្រូវតាមក្រឡាផ្ទៃនោះមែនឬទេ? ដែលលោកនាយករដ្ឋមន្ត្រីខ្មែរ បានទៅកំណត់បោះបង្គោលព្រំដែនជាមួយយួនក្ដី ជាមួយសៀមក្ដី ជាមួយលាវក្ដី លោកដឹងថា : តើការបោះបង្គោលព្រំដែនដូចមាននៅលើផែនទីនោះ ត្រឹមត្រូវពិតប្រាកដមែនឬទេ?

លុះមកដល់ឥឡូវនេះ ហេតុការណ៍ជាច្រើនបានកើតឡើង ដោយសារប្រជាពលរដ្ឋខ្មែររស់នៅតាមបណ្ដោយព្រំដែន ដែលធ្លាប់តែមានភូមិស្រុក មានដីស្រែចំការ បានត្រូវបានបាត់បង់ស្ទើរគ្រប់គ្នា ចំណែកប្រជាពលរដ្ឋយួន គេពុំដែលឮថា គេបាត់បង់ទឹកដីគេដោយសារការបោះបង្គោលសោះឡើយ។

គួរឱ្យមានការងឿងឆ្ងល់ខ្លាំងណាស់ពីសំណាក់ប្រជាពលរដ្ឋខ្មែរស្នេហាជាតិពិតប្រាកដគ្រប់មជ្ឈដ្ឋាន និងមតិអន្តរជាតិផងដែរ។

**សេចក្ដីសំណូមពរ និងដំណោះស្រាយ :**

ដោយសារតែការបាត់បង់ទឹកដីនៃប្រទេសកម្ពុជានេះ បានបង្កើតឱ្យមានបញ្ហាវិបត្តិផ្នែកនយោបាយមួយយ៉ាងធ្ងន់ធ្ងរណាស់ បើសិនជានាយករដ្ឋមន្ត្រីខ្មែរ និងមន្ត្រីគ្រប់ជាន់ថ្នាក់ ជាគណៈរដ្ឋមន្ត្រី រួមទាំងអាជ្ញាធរមូលដ្ឋានទាំងអស់ នាំគ្នាយកទឹកដីប្រទេសខ្មែរ ទៅធ្វើជាទ្រព្យសម្បត្តិផ្ទាល់ខ្លួន ហើយអស់លោកគ្មានចំណាប់អារម្មណ៍បន្តិចបន្តួចសោះក្នុងការការពារ និងត្រួតពិនិត្យឱ្យបានត្រឹមត្រូវ ថែមទាំងបណ្ដោយឱ្យមេដឹកនាំនៃប្រទេសវៀតណាម រំលោភបំពានស្រេចតែក្បាលចិត្ត ប្រើប្រាស់ទឹកដីខ្មែរតាមព្រំប្រទល់ដែនតាមតែទំនើងចិត្តចង់ចូលមកធ្វើអ្វីៗ និងរស់នៅត្រង់កន្លែងណាបានដោយសេរីមិនតែប៉ុណ្ណោះ ពេលមានកើតហេតុលើប្រជាពលរដ្ឋក្នុងការបាត់បង់ភូមិស្រុក ដីស្រែចំការម្ដងៗ ពលរដ្ឋខ្មែរតែងតែរងទុក្ខវេទនាស្ទើរឆ្កួតវង្វេងដោយសារតែអំពើឈ្លានពានពីយួន។

ផ្ទុយទៅវិញ មន្ត្រីសំខាន់ៗខ្មែរ តែងតែចោទប្រកាន់ទៅលើជនជាតិខ្មែរថា ជាជនទៅរំលោភលើទឹកដីយួនទៅវិញ ថែមទាំងប្រើអំណាចទៅគម្រាមកំហែង ចាប់ដាក់គុកទៀតផង។

**សួរថា** : តើទង្វើការប្រព្រឹត្តនិងពាក្យសំដីដែលនាយករដ្ឋមន្ត្រី មន្ត្រីគ្រប់តំណែងបានសំដែងចេញមកលើប្រទេស និងប្រជាជាតិខ្មែរនេះ វាសមរម្យនឹងរូបលោកជាជាតិសាសន៍ខ្មែរទៅបានឬទេ?

ដើម្បីជាដំណោះស្រាយពីបញ្ហាវិបត្តិព្រំដែននេះ សូមនាយករដ្ឋមន្ត្រីខ្មែរ លើកយកផ្ទៃក្រឡាទំហំ ១៨១.០៣៥គីឡូម៉ែត្រក្រឡានេះ មកធ្វើជាចំណោទធរណីមាត្រទៅតាមរូបរាងទ្រង់ទ្រាយនៃផែនដី ដែលមានជាបួនជ្រុងក្ដី បីជ្រុងក្ដី ឬមូលក្ដី ដែលនិស្សិតម្នាក់បានរៀននៅក្នុងសាលា ទៅតាមរូបមន្តផ្សេងៗ សម្រាប់យកចម្លើយជាលទ្ធផលពិតប្រាកដ។

មន្ត្រីដែលជាអ្នកទទួលខុស និងត្រូវពីរឿងព្រំដែនខ្មែរ ដែលមានឈ្មោះ វ៉ាគីមហុង ជាមន្ត្រីជំនាញខាងព្រំដែន លោកត្រូវតែចេះធ្វើចំណោទធរណីមាត្រនេះ ទើបលោកមានសមត្ថភាពពេញខ្នាតក្នុងការត្រួតពិនិត្យដាក់បង្គោលព្រំដែន និងដាក់គំនូសខ្សែបន្ទាត់ព្រំដែនឱ្យបានត្រឹមត្រូវពិតប្រាកដទៅបានមែន។

## ព័ត៌មានពីសមាគមវៀតណាមនៅកម្ពុជា



សមាគមវៀតណាមនៅភ្នំពេញ បានរៀបចំអង្គប្រជុំរបស់គេមួយនៅភ្នំពេញ កាលពីថ្ងៃទី១៦ មករា ឆ្នាំ២០១១ ដើម្បីគោរព និងរំលឹកដល់សន្និបាតបក្សកុម្មុយនិស្តវៀតណាម ឆ្នាំ២០១១។ សមាគមនេះបានពង្រីកគណៈកម្មាធិការសាខានៅខណ្ឌ៨ នៃទីក្រុងភ្នំពេញ ដោយបានកើត ការិយាល័យនៅជាង ៥០សង្កាត់ក្នុងទីក្រុងនេះ បើតាមការប្រកាសរបស់ប្រធានសមាគម ក្រាន វ៉ាន តយ។

បើទោះជាជនវៀតណាម នៅក្រីក្រច្រើនសហគមន៍នេះ នៅតែងាកទៅរកប្រទេសកំណើតរបស់ខ្លួន។ កាលពីឆ្នាំ២០១០ ពួកគេបានប្រមូលប្រាក់ដើម្បីទៅជួយកងទ័ព ដែលកំពុងបំពេញការងារនៅជ្រោយ ទ្រឿង សា និងជួយដល់គ្រោះថ្នាក់ទឹកលិចនៅតំបន់កណ្ដាល...។

*ទីភ្នាក់ងារព័ត៌មានវៀតណាមថ្ងៃ១៨ /០១/២០១១*

វេជ្ជបណ្ឌិត ហូ តា មកពីស្នាក់ការនៅហូជីមិញស៊ីទី បានមកធ្វើការចែកអំណោយ និងព្យាបាលដោយអត់យកកំរៃដល់ជនក្រីក្រវៀតណាម២០០នាក់ ដែលរស់នៅរកុងព្រះសីហនុ នៃប្រទេសកម្ពុជា កាលពីថ្ងៃទី៨ ខែមករាកន្លងមកនេះ អំណោយពេលនោះមានតម្លៃ២០ម៉ឺនដុង បានចែកជូនដល់អ្នកជម្ងឺក្រៗ ចំនួន១៥០នាក់ កាលពីខែសីហា ឆ្នាំ២០១០ លោកវេជ្ជបណ្ឌិត ហូ តាំ បានចែកអំណោយដល់ជនក្រីក្រវៀតណាមនៅទន្លេសាបចំនួន១៥០នាក់...។

*ព័ត៌មានវិទ្យុសម្លេងវៀតណាម នៅហាណូយ ១០/០១/២០១១*

អ្នកស្រីប្រធានមូលនិធិសម្រាប់សហគមន៍វៀតណាម ទ្រឿង មីហ្វា បានទៅបំពេញទស្សនៈកិច្ច៤ថ្ងៃនៅកម្ពុជា។ អ្នកស្រីបានទៅធ្វើការជាមួយនឹងអាជ្ញាធរខ្មែរ នៅក្រុងព្រះសីហនុ, កោះកុង និងខេត្តសៀមរាប ដើម្បីថែរក្សាទំនាក់ទំនងល្អរវាងអង្គការអ្នកស្រី និងសហគមន៍វៀតណាមដែលរស់នៅកម្ពុជា។ អ្នកស្រី ទ្រឿង បានជួបនឹង វៀត គៀវ (យួននៅបរទេស) ដើម្បីស្ដាប់បញ្ហាដែលមានជារៀងរាល់ថ្ងៃ។ គណប្រតិភូ បានប្រគល់អំណោយ ៦០០ ដែលមានតម្លៃស្មើ ១២.០០០ដុល្លារ ដល់គ្រួសារវៀតណាមដែលក្រីក្រ និងខ្មែរ។ អំណោយ ១៥ទៀតឱ្យទៅកុមារយួននៅក្រុងព្រះសីហនុ ដែលរៀនបានលទ្ធផលល្អ នាឆ្នាំសិក្សា២០១០-២០១១៕

*ទីភ្នាក់ងារព័ត៌មានវៀតណាម ១៧/០១/២០១១*

# What Ever Happened to Sam Meas.....

**ឡូវែល. ម៉ាសាឈូសែត :**




មាស សែម ដែលមានឈ្មោះបោះសម្លេងដោយសារតែបានជាបេក្ខជនសភានៅសង្កាត់លេខ ៥ កាលពីខែវិច្ឆិកា ឆ្នាំ២០១០ នេះ តែពុំបានជាប់ឆ្នោតនោះទេ តើឥឡូវនេះក្លាយទៅជាអ្វី ទៅហើយ?

អគ្រា ជា បានស្រាវជ្រាវជូនជាព័ត៌មានដល់លោកអ្នកអានជាភាសាអង់គ្លេសថា ៉ លោក មាស សែម បន្ទាប់ពីបានលាលែងពីតំណែងដ៏សំខាន់មួយនៅធានាគារ ដើម្បីមកឈរឈ្មោះជាបេក្ខជនជាតួនាទីធ្វើការពេញម៉ោង តែគ្មានប្រាក់បៀវវត្សរ៍ ឥឡូវនេះបានយល់ព្រមទទួលការងារកិត្តិយសមួយទៀត អមដោយអភិបាលក្រុងក្នុងតួនាទី THE MAJOR´S WATER SUPPLY BOARD នាទីក្រុង HAVERHILL រដ្ឋម៉ាសាឈូសែត ។

លោក មាស សែម នៅចូលរួមជាអនុប្រធានគណកម្មាធិការនាយករបស់សមាគម MENTAL HEALTH ASSOCIATION INC នៅឡើយ ។ ជាមួយគ្នានេះផងដែរ បានចូលធ្វើប្រមូលប្រាក់ជួយដល់ជនរងគ្រោះនាឱកាសបុណ្យអុំទូកបានជាង៤ពាន់ដុល្លារថែមទៀត ។

Sam Meas, a candidate for the 2010 Fifth Congressional District of Massa-chu setts was sworn in on 12/8/2010 at Haverhill City Hall as he accepted Major James Fiorentini (Dem) invitation to serve on the Major's Water Supply Board.

The Water Supply Board plays a very significant role in researching water resource, regulating water usage for the city residents and commercial businesses a like. The Board also responsible for making long-term recommendation for the Major.

Meas reported Major Fiorentini contacted him to serve on the board. According to Haverhill Gazette, Major Fiorentini described Meas as "a very conservative guy." He also continued, "He's got a business background, and I wanted someone to work with the business community. I want all points of view. I thought he would be a good fit."

Water Supply Board is a non-salary base position that serves as the Major's Advisory Committee who will meet monthly and provide cause of recommendation to the Major by June 2011. Meas will start his first board meeting in January 2011.

Sam Meas resigned from his prestige position as Principle of State Street Bank Global Advisor, with a three figures salary in April of 2010, to commit fully on his campaign as a candidate for the Fifth Congressional District in Massa-chusetts. He came second during the 2010 Primary Election. He was defeated by his running mate Jon Golnik.

Meas reported he currently also serving as a Vice Chairman of the North Suffolk Mental Health Association, Inc., a Non-Profit organization, Board of Director. He has been serving on this Board since June 2001. When ask about current employment he said, "I have several employment prospects, but I am looking into financial planning."



Meas also involved in "Memorial Emergency Relief Fund" in partnership with other Cambodian-American foundations to support the families of the victims in the tragic stamped in Cambodia on November 22, 2010. This group raised a total fund of $4,183 on December 4, 2010. The group agreed to have Sam Meas deliver the fund to the victims' family in person.

On January 17, 2011 Meas sent out a statement to his supporters stating, "Thank you very much for all of your dedication and support in my candidacy, Koun Khmer. I forever am profoundly grateful!" With him Meas brought $5,000 and some medical supply such as Aspirin, Tylenol, and other medicines for the surviving victims of "Stampede" tragedy happened on the last day of the Cambodian annual Water Festival in November 2010 that lead to hundreds of death and injured.

According to his Community Relation Representative Sam Meas left to Cambodia on January 18, 2011 and planed to be there for a "couple of weeks". He will provide report on his trip and plans with "Khmer Community" for the future upon his return from Cambodia said Meas.

In December 2010 Meas has publicly announced his future plan to run for office again in the future. Serving on the local office with the Major of Haverhill is a sign of keeping himself motivated and political desire alive.

Meas is not the only candidate in 2010 who left a well respected salary to run for political office. Charles Baker, candidate for governor who was defeated by the Democrat and re-elected Deval Patrick also resigned in July 2010 from his $1.5 million annual salary and bonus as CEO of Harvard Pilgrim Health Care to commit running full-time in his governor campaign as well.

ពេលវេលា និងម៉ោងផ្សាយកម្មវិធីជាភាសាខ្មែរ
តាមរយៈស្ថានីយ៍ទូរទស្សន៍ប៉ុស្ដិ៍លេខ ៨ ក្រុងឡូវែល រដ្ឋម៉ាសាឈូសេត

| ថ្ងៃ Date | ឈ្មោះកម្មវិធី Program | ម៉ោង Time | រយៈពេល Duration |
|---|---|---|---|
| ថ្ងៃច័ន្ទ Monday | ប្រពៃណីខ្មែរ | 12:00 PM | 01:00:00 |
| | សម្លេងខ្មែរ-អាមេរិកាំង | 08:00 PM | 01:00:00 |
| | ជីវិតថ្មី Jivit Thmei | 09:00 PM | 01:00:00 |
| ថ្ងៃអង្គារ Tuesday | ខ្មែរក្រុងឡូវែល | 12:00 PM | 01:00:00 |
| | ខ្មែរភៀសខ្លួន Khmer Refugee | 06:00 PM | 01:00:00 |
| | ជីវិត និង សិល្បៈ Life and Arts | 07:00 PM | 00:30:00 |
| ថ្ងៃពុធ Wednesday | សមាគមខ្មែរ CMAA TV Show | 07:00 PM | 01:00:00 |
| | មនោសញ្ចេតនាខ្មែរ | 08:00 PM | 01:00:00 |
| ថ្ងៃព្រហស្បត្តិ៍ Thursday | បុណ្យអុំទូក | 07:00 PM | 01:00:00 |
| | នាទីសង្គមខ្មែរ | 08:00 PM | 01:00:00 |
| ថ្ងៃសុក្រ Friday | ព្រះពុទ្ធសាសនាខ្មែរ | 12:00 PM | 01:00:00 |
| | Khmer Charisma Live | 05:00 PM | 01:00:00 |
| | ព័ត៌មានវត្ត Temple News | 08:00 PM | 01:00:00 |
| ថ្ងៃសៅរ៍ Saturday | Cambodian Baptist | 03:00 PM | 01:00:00 |
| ថ្ងៃអាទិត្យ Sunday | ដំណើរទៅស្រុកខ្មែរ | 06:00 PM | 01:00:00 |

ពេលវេលា និងម៉ោង ផ្សាយកម្មវិធីជាភាសាខ្មែរ
តាមរយៈស្ថានីយ៍ទូរទស្សន៍ប៉ុស្ដិ៍លេខ ៩៥ ក្រុងឡូវែល រដ្ឋម៉ាសាឈូសេត

| ថ្ងៃ Date | ឈ្មោះកម្មវិធី Program | ម៉ោង Time | រយៈពេល Duration |
|---|---|---|---|
| ថ្ងៃច័ន្ទ Monday | Cambodian Baptist | 09:00 AM | 01:00:00 |
| | ខ្មែរភៀសខ្លួន Khmer Refugee | 07:00 PM | 01:00:00 |
| ថ្ងៃអង្គារ Tuesday | ប្រពៃណីខ្មែរ Khmer Tradition | 12:00 PM | 01:00:00 |
| | Khmer Charisma | 03:00 PM | 01:00:00 |
| ថ្ងៃព្រហស្បត្តិ៍ Thursday | ព័ត៌មានវត្ត Temple News | 08:00 PM | 01:00:00 |
| ថ្ងៃសុក្រ Friday | ដំណើរទៅស្រុកខ្មែរ | 02:00 PM | 01:00:00 |
| | ជីវិតថ្មី Jivit Thmei | 07:00 PM | 01:00:00 |
| | មនោសញ្ចេតនាខ្មែរ | 08:00 PM | 01:00:00 |
| ថ្ងៃសៅរ៍ Saturday | ព្រះពុទ្ធសាសនាខ្មែរ | 03:00 PM | 01:00:00 |
| | ខ្មែរក្រុងឡូវែល Khmer Lowell | 04:00 PM | 01:00:00 |
| ថ្ងៃអាទិត្យ Sunday | នាទីសង្គមខ្មែរ Khmer Talk | 12:00 PM | 01:00:00 |
| | សមាគមខ្មែរ CMAA TV Show | 01:00 PM | 01:00:00 |
| | បុណ្យអុំទូក | 05:00 PM | 01:00:00 |
| | ជីវិត និងសិល្បៈ Life and Arts | 06:00 PM | 00:30:00 |
| | សម្លេងខ្មែរ-អាមេរិកាំង | 07:00 PM | 01:00:00 |

ពេលវេលា និងម៉ោងផ្សាយកម្មវិធីជាភាសាខ្មែរ
តាមរយៈវិទ្យុ **WUML - 91.5 FM** ក្រុងឡូវែល រដ្ឋម៉ាស្សាឈូសេត

| វិទ្យុសំឡេងកុលបុត្រខ្មែរ Voice of Cambodian Children | វិទ្យុសំឡេងសមាគមខ្មែរ Voice of CMAA-Thinking Out Loud Radio |
|---|---|
| ផ្សាយរាល់ថ្ងៃអាទិត្យ ម៉ោង១រសៀល ដល់ម៉ោង៥ល្ងាច | ផ្សាយរាល់ថ្ងៃសុក្រ ម៉ោង១១ព្រឹក ដល់ម៉ោង១២ថ្ងៃត្រង់ |

វាចាព្រឹទ្ធាចារ្យ ម៉ម យីន

# សួស្តីឆ្នាំថ្មីសកល២០១១!



•សង្ឃាតវិលជុំវិញខ្លួននៃផែនដីបាន១ជុំក្នុង១ថ្ងៃ និងជុំវិញព្រះអាទិត្យបាន១ជុំក្នុង១ឆ្នាំ ដែលជាសញ្ញាពីការវិវដ្តប្រែប្រួលទៅនៃថ្ងៃខែឆ្នាំ។

រយៈពេល១ឆ្នាំកន្លងទៅ គឺជាពេលវេលាមួយដែលបណ្តាជនម្នាក់ៗ រមែងបានខិតខំប្រឹងប្រែងកែឆ្នៃលក្ខណៈស្ថានភាពជីវិតរបស់ខ្លួន ដោយមេត្តាតាំងចិត្តថា ក្នុងមួយឆ្នាំនេះ ត្រូវតែបំពេញភារកិច្ចទៅតាមមុខនាទី មុខរបរដែលម្នាក់ៗបានជ្រើសរើសយកមកប្រកបជារៀងរាល់ថ្ងៃ ដើម្បីបានកំរៃជាប្រាក់បៀវត្សរ៍ ជាប្រាក់ចំណេញ ឬជាប្រាក់រង្វាន់ សម្រាប់យកមកបំពេញការខ្វះខាត ចិញ្ចឹមជីវិតខ្លួនឯង និងគ្រួសារ ព្រមទាំងកែឆ្នៃសុវត្ថិភាពគ្រួសារឱ្យមានកិត្តិយស មានតម្លៃ មានសុភមង្គលឱ្យកាន់តែល្អប្រសើរឡើងៗ មានន័យថា កិត្តិយសក្តី សេចក្តីថ្លៃថ្នូក្តី សេចក្តីសុខសាន្តក្តី សុវត្ថិភាព និងសុភមង្គលក្នុងគ្រួសារក្តី បានកើតចេញមកពីការខិតខំប្រឹងប្រែងព្យាយាម ស្វែងរកដោយខ្លួនឯងម្នាក់ៗ ទើបបានសម្រេចជោគជ័យក្នុងជីវិតជាពិប្រាកដ។

បណ្តាប្រជាលោក ស្ទើរតែ១០០ភាគរយ បានផ្តោតអារម្មណ៍របស់ខ្លួន នៅក្នុងពេលបំណាច់ឆ្នាំចាស់ហើយចាប់ផ្តើមចូលឆ្នាំថ្មីម្តងៗ ម្នាក់ៗតែងតែមានបញ្ហាញនូវប្រតិកម្មរៀងៗខ្លួន ទៅតាមការយល់ឃើញរបស់ខ្លួន មានខ្លះបានដណ្តឹងសួរគ្នាថា តើនៅក្នុងរយៈពេលមួយឆ្នាំ បានកន្លងទៅនេះ យើងបានធ្វើអ្វីខ្លះ?

តើស្ថានភាពជីវិតរស់នៅដូចម្តេចខ្លះ?

តើបានសន្សំលុយទុកបានប៉ុន្មាន?

តើមានកូនប្រុស កូនស្រីបានរៀនសូត្រដល់ថ្នាក់ណាខ្លះ និងចប់ការសិក្សាបានសម្រេចជោគជ័យបានប៉ុន្មាននាក់?

នេះជាសំនួរខ្លះ ដែលចង់ដឹងពីឆ្នាំចាស់កន្លងទៅ។

ចំណែកនៅពេលចូលឆ្នាំថ្មី ដែលនឹងមានបន្តទៅទៀតរយៈពេលមួយឆ្នាំខាងមុខ ក៏មានសំនួររំឮកគ្នាថា តើនៅក្នុងឆ្នាំថ្មីនេះ យើងអាចមានគម្រោងធ្វើអ្វីជាច្រើនតទៅទៀត?

តើឆ្នាំថ្មី នឹងអាចនាំយើងឱ្យទៅតាមសេចក្តីប៉ងប្រាថ្នារបស់យើងបានឬទេ? ឱ្យត្រូវទៅតាមពាក្យមួយឃ្លា ដែលនិយាយថា ឆ្នាំថ្មី គឺជាគំនិតថ្មី ជាចិត្តថ្មី មានគម្រោងផែនការថ្មី ហើយត្រូវខិតខំប្រព្រឹត្តធ្វើអ្វីៗ បង្ហាញជាលក្ខណៈទាំងអស់។

ឆ្នាំដែលកន្លងហួសទៅ ជាឆ្នាំចាស់ តែងតែបង្កើនអាយុមនុស្សម្នាក់ៗ ឱ្យកាន់តែច្រើនឡើង ប៉ុន្តែវាកាន់តែកាត់បន្ថយអាយុឱ្យមនុស្សកាន់តែខិតទៅជិតដល់កំណត់លាចាកលោកនេះទៅវិញ។ ដូច្នេះមនុស្សម្នាក់ៗ តែងតែមានសតិអារម្មណ៍ខុសគ្នា ខ្លះយល់ថា ចូលឆ្នាំថ្មី យើងសប្បាយរីករាយណាស់ ដោយសារតែបានទទួលជោគជ័យជាច្រើនពីឆ្នាំចាស់មក ហើយមុខជាបានទទួលជោគជ័យថ្មីជាច្រើនទៀត នៅក្នុងឆ្នាំថ្មីខាងមុខនេះ។

ចំណែកខ្លះ យល់ថា ចូលឆ្នាំថ្មី គឺបានធ្វើឱ្យខ្លួនកាន់តែចាស់បន្តិចម្តងៗ កម្លាំងកាន់តែអន់ខ្សោយបន្តិចម្តងៗ សុខភាពកាន់តែទ្រុឌទ្រោមបន្តិចម្តងៗ ដែលសន្និដ្ឋានបានថា អាយុជីវិតរបស់ខ្លួន បានខិតទៅដល់ថ្ងៃមរណភាពណាស់ហើយដែរ ប៉ុន្តែទោះបីជាយ៉ាងនេះក៏ដោយ ក៏វាជាការវិវដ្តទៅនៃជីវិតរបស់មនុស្ស សត្វទូទៅនៅក្នុងលោក ដែលចាត់ទុកថាជាសភាវធម៌ធម្មតារបស់មនុស្ស និងសត្វ។

ដោយសារតែនេះជាសភាវធម្មតា ទើបសារព័ត៌មានខ្មែរប៉ុស្តិ៍ ដែលជាអង្គការផ្សព្វផ្សាយព័ត៌មានជួយផ្តល់ចំណេះវិជ្ជាចេះដឹងទូទៅ ជួយផ្តល់ដំណោះស្រាយបញ្ហាផ្សេងៗ ក្នុងសង្គម ជួយពន្យល់ណែនាំបណ្តាជន និងសង្គមឱ្យបានស្វែងរកឃើញសេចក្តីសុខសាន្ត សុភមង្គលវិបុលសុខ សុវត្ថិភាព និងយុត្តិធម៌នៅក្នុងសង្គម។ ដូច្នេះ នៅក្នុងរយៈពេល១ឆ្នាំ២០បានកន្លងទៅ ខ្មែរប៉ុស្តិ៍ បានបំពេញភារកិច្ចមួយដ៏មមាញឹក ស្វិតស្វាញ អំណត់អត់ធន់ ទោះបីមានការជួបប្រទះនឹងឧបសគ្គ ខ្វះខាតខាងផ្នែកមធ្យោបាយជាសម្ភារៈ ឬថវិកាយ៉ាងណាក៏ដោយ ក៏ក្រុមប្រឹក្សាភិបាលខ្មែរប៉ុស្តិ៍ រួមជាមួយលោកនាយក បានខិតខំដោយអស់ពីសមត្ថភាព ដើម្បីបំរើដល់សហគមន៍ជាតិខ្មែរ និងសង្គមគ្រួសារខ្មែរ ដោយពេញទំហឹង និងស្មោះស្ម័គ្របំផុត ដែលជាសក្ខីភាពនៃសេចក្តីពេញចិត្ត សេចក្តីស្រឡាញ់ និងសេចក្តីប្តេជ្ញាតាំងចិត្តរបស់យើងខ្ញុំទាំងអស់គ្នា ជាអ្នកសរសេរព័ត៌មាន។

នៅក្នុងឱកាលចូលឆ្នាំថ្មី២០១១នេះ សូមបន់ស្រន់ខ្ញុំបួងសួងដល់គុណបុណ្យព្រះគ្រប់ព្រះអង្គ និងទេវតារក្សាឆ្នាំថ្មី សូមព្រះអង្គប្រទាននូវព្រះពរជ័យសិរីមង្គល វិបុលសុខ មហាប្រសើរគ្រប់ប្រការ មានសុខភាពល្អ និងមានអាយុយឺនយូរគ្រប់ៗគ្នាក្នុងឆ្នាំថ្មីនេះ និងក្នុងឆ្នាំជាបន្តៗទៅខាងមុខទៀត កុំបីឃ្លៀងឃ្លាតឡើយ។

ជាពិសេសខ្មែរប៉ុស្តិ៍ សូមថ្លែងអំណរអរគុណជាអតិបរមាដល់អស់លោកដែលជាអតិថិជនប្រកបមុខរបររកទទួលទាន ជាពាណិជ្ជករគ្រប់វិស័យ ដែលបានជួយផ្គត់ផ្គង់ ឧបត្ថម្ភផ្នែកថវិកា បណ្តាលឱ្យខ្មែរប៉ុស្តិ៍ មានជីវិតរស់រានដ៏ល្អប្រសើររហូតមកដល់សព្វថ្ងៃនេះ សូមប្រសិទ្ធពរជ័យគ្រប់ប្រការ រមែងកើតមានដល់អស់លោកអ្នកទាំងនោះជានិច្ចនិរន្តន៍តរៀងទៅដែរ៕

**សួស្តី និងសប្បាយរីករាយឆ្នាំថ្មី ២០១១ !**

# វត្តព្រះពុទ្ធប្រទានពរនៅក្នុងប្រព័ន្ធតុលាការ

**ខ្មែរប៉ុស្តិ៍, ហ្វីឡាដែលហ្វៀ :**

គណៈកម្មាធិការនាយកវត្ត បានមករួមប្រជុំពេញអង្គ ចំនួនប្រមាណ១៥នាក់កាលពីថ្ងៃអាទិត្យទី១៦ ខែមករា ឆ្នាំ២០១១ ដើម្បីពិភាក្សាពីបណ្តឹងរវាងគណៈកម្មាធិការវត្តជាមួយនឹងអតីតចៅអធិការវត្តព្រះពុទ្ធប្រទានពរ ស្ថិតនៅជ្រុងផ្លូវលេខ ១៨ ខាងត្បូង និង មីហ្លីន ហ្វីឡាដែលហ្វៀ។



អតីតចៅអធិការវត្តឈ្មោះ ស៊ុម សាត់ ស៊ូវ៉ាន់វ៉ាត បានលាចាកសិក្ខាបទនាថ្ងៃទី៩ ខែធ្នូ ឆ្នាំ២០០៧ ហើយទាមទារយកទីវត្តព្រះពុទ្ធប្រទានពរ ថាជាសម្បត្តិផ្ទាល់របស់លោក រីឯប្រធានវត្ត គឺលោក ហ៊ល ត្រៃ និងព្រះតេជគុណ សារិម សុទ្ធ ជាចៅអធិការបន្តមក ពុំបានយល់ស្របទេថា "វត្តពុំមានជាសម្បត្តិរបស់លោក ស៊ុម សាត់ នោះទេ"។ អតីតចៅអធិការសំណាក់នៅបន្ទប់មួយនៃទីវត្តអារាមនោះជាសម្បត្តិរបស់វត្តព្រះពុទ្ធវង្សីគ្រប់គ្រងដោយគណៈកម្មាធិការវត្ត ដែលមានព្រះសង្ឃជាចៅអធិការជាប្រធាន។ បើតាមឯកសារដែលយើងទទួលបានមានលិខិតឆ្លើយឆ្លងស៊ីសងប្រាក់ជំពាក់ជាបន្តបន្ទប់រវាង លោក ស៊ុម សាត់ និងតំណាងគណៈកម្មាធិការវត្តក្នុងរូបភាពមិនប្រក្រតី យកប្រើប្រាស់ជាផ្លូវការណ៍ពុំបានទេ ដែលពេលនេះរូបភាពនៃប្រាក់ជំពាក់ ឬជាអំណោយ ឬប្រាក់សងពុំមានអ្វីជាក់លាក់ច្បាស់ឡើយ។

គណៈកម្មាធិការថ្មី បានធ្វើសេចក្តីសម្រេចចិត្តកាលពីថ្ងៃទី១២ ខែកក្កដា ឆ្នាំ២០០៩ សុំឱ្យ ស៊ុម សាត់ចេញពីបរិវេណវត្ត។ នៅលើន័យនេះ ស៊ុម សាត់ បានយកលិខិតដែលមានហត្ថលេខារបស់មេធាវី ខេណិត ស្តីហ្គេល មកបិទនៅក្នុងវត្ត "មិនដែនបានធ្វើលិខិតលាលែងពីតំណែងចៅអធិការនោះទេ ហើយទាមទារឱ្យរកលិខិតនោះមកបង្ហាញ តែពីអតីតកាលមករកមិនបានទេ ដូច្នេះ បើមិនមានលិខិតលាឈប់ទេនោះ ស៊ុម សាត់ នៅតែជាប្រធានវត្តដដែល ហើយអ្នកបណ្តេញគេគឺក្រុមមនុស្សខុសច្បាប់ មកលបលួចនៅក្នុងទីវត្ត..."។

នៅថ្ងៃទី៣ ខែកុម្ភៈខាងមុខ គូរបដិបក្ខលើកម្មសិទ្ធិវត្តព្រះពុទ្ធប្រទានពរ នឹងទៅជួបគ្នានៅសាលាជំនុំជំរះវិវាទ ដើម្បីបង្ហាញភស្តុតាងអំពីភាពស្របច្បាប់ និងភាពសុចរិតរបស់ខ្លួនដល់តុលាការ។

លោក ស៊ុម សាក់ និយាយថា: វត្តនេះជារបស់នរណា តុលាការនឹងចេញសេចក្តីសម្រេច ពេលនោះដឹងគ្នាហើយ។

យើងនឹងបន្តសេចក្តីរាយការណ៍នៅពេលមានព័ត៌មានថ្មីចេញមក៕

# ក្រុមផ្សេងៗក្នុងសហគមន៍ខ្មែរហ្វីឡាធ្វើបុណ្យរួមគ្នាតែបក្សប្រជាជនកម្ពុជាពុំចូលរួមឡើយ



**ដោយៈ អ៊ឹមលឿម**

នារសៀលថ្ងៃអាទិត្យ ទី១៦ ខែមករាកន្លងមកនេះ នៅឯវត្តបាលេលេយ្យ ស្ថិតនៅតំបន់ហ្វីឡាដែលហ្វៀខាងត្បូងមានកិច្ចប្រជុំមួយដែលមានការចូលរួមដោយក្រុមចម្រុះជាច្រើន ដោយក្នុងនោះតំណាងវត្តចំនួនបី ដែលស្ថិតក្នុងសហគមន៍ហ្វីឡាដែលហ្វៀ ក៏បានបង្ហាញនូវវត្តមានរបស់ខ្លួននាឱកាសនោះដែរ។ នេះជាកិច្ចប្រជុំលើកទី២បន្ទាប់ពីកាលពីថ្ងៃសៅរ៍ ទី៤ ខែធ្នូ ឆ្នាំ២០១០ កន្លងមកនេះ ដែលកិច្ចប្រជុំលើកទី១ ត្រូវបានគេរៀបចំធ្វើឡើងនៅឯទីស្នាក់ការរបស់សមាគមចាស់ព្រឹទ្ធាចារ្យខ្មែរ-អាមេរិកាំង ដែលលទ្ធផលក្នុងកិច្ចប្រជុំនាគ្រានោះ ពុំបានសម្រេចបានផ្លែផ្កា ជាដុំកំភួនណាមួយឡើយ។

ទីបញ្ចប់ក្នុងជំនួបលោកទី២នេះ អង្គប្រជុំត្រូវបានរកច្រកចេញដោយការអនុម័តជាឯកច្ឆន្ទ ក្នុងការយកថ្ងៃទី១២-១៣ ខែមិនា ឆ្នាំ២០១១ សម្រាប់ធ្វើបុណ្យរួមគ្នាមួយ នៅវត្តបាលេលេយ្យ ដើម្បីជាការឧទ្ទិសកុសលដល់វិញ្ញាណក្ខ័ន្ធចំពោះអ្នកស្លាប់បាត់បង់ជីវិតក្នុងមហាសោកនាដកម្មនៅលើស្ពានកោះពេជ្យនាថ្ងៃទី២២ ខែវិច្ឆិកា ឆ្នាំ២០១០កន្លងមកនេះ។

ខាងក្រោមនេះជាសមាសភាពនៃក្រុមនិងអង្គភាពនានាដែលបានចូលរួមធ្វើបុណ្យ :

១- សមាគមចាស់ព្រឹទ្ធាចារ្យខ្មែរ-អាមេរិកាំង
២- សមាគមខ្មែរប្រចាំក្រុងហ្វីឡាដែលហ្វៀ
៣- វត្តបាលេលេយ្យ
៤- វត្តព្រះពុទ្ធរង្សី
៥- វត្តព្រះពុទ្ធប្រទានពរ
៦- កាសែតខ្មែរប៉ុស្តិ៍ ស.រ.អា
៧- សាខាគណបក្សសិទ្ធិមនុស្សប្រចាំរដ្ឋ PA
៨- សាខាគណបក្សសមរង្ស៊ីប្រចាំរដ្ឋ PA
៩- ចលនាមហាចក្រខ្មែរ-ខម
១០- ព្រះវិហារគ្រីស្ទៀនខ្មែរ-អាមេរិកាំង

លោក ផល ឈឿន ប្រធានគណកម្មការរៀបចំធ្វើបុណ្យនេះបានបំភ្លឺជូនអង្គមិទ្ទិញទាំងមូលថា: ខាងសាខាគណបក្សប្រជាជនកម្ពុជាប្រចាំទីក្រុងហ្វីឡាដែលហ្វៀ បានបដិសេធពុំចូលរួមក្នុងការធ្វើបុណ្យរួមគ្នានោះឡើយ ហើយចំពោះភាពឯកោរបស់សាខាគណបក្សប្រជាជននេះ ពុំត្រូវបានប្រធានគណកម្មការលោក ផល ឈឿន បញ្ជាក់អំពីហេតុផលឱ្យបានច្បាស់លាស់ឡើយដែរ។

ដោយឡែកចំពោះវត្តសុរិយារង្សី ស្ថិតនៅលើផងវិថី Rising Son នាតំបន់ហ្វីឡាដែលហ្វៀខាងជើង ក៏ពុំបានចូលរួមធ្វើបុណ្យនោះដែរ ព្រោះពុំមានការឯកភាពគ្នារវាងក្រុមពុទ្ធបរិសុទ្ធចំណុះជើងវត្តជាមួយព្រះសង្ឃ ព្រោះខាងព្រះសង្ឃបានឯកភាពក្នុងការធ្វើបុណ្យរួមគ្នានោះដែរ តែខាងគណកម្មការវត្តពុំបានយល់ស្របឡើយ។ នេះជាបញ្ជាក់ពីលោក ផល ឈឿន ។

ចំណោះការលើកឡើងខាងលើនេះ ត្រូវបានមតិភាគច្រើនក្នុងអង្គប្រជុំធ្វើការបដិសេធ ដោយអះអាងថា នោះជាមធ្យោបាយពុំសមស្របឡើយ ព្រោះកាកបាទក្រហមកម្ពុជា ដែលដឹកនាំដោយលោកលោកស្រីប៊ុនរ៉ានី និងមូលនិធិទូរទស្សន៍បាយ័ន្តគ្រប់គ្រងដោយអ្នកស្រី ហ៊ុន ម៉ាណា បុត្រីរបស់លោក ហ៊ុន សែន គឺជាស្ថាប័នពុំឯករាជឡើយ ព្រោះស្ថាប័នទាំងពីរនោះ បំរើផលប្រយោជន៍នយោបាយជាផលប្រយោជន៍រួម នេះជាការថ្លែងពីសំណាក់អ្នកចូលរួមប្រជុំ...។

ថ្ងៃអាទិត្យ ទី១៣ ខែកុម្ភៈ ឆ្នាំ២០១១ ខាងមុននៅឯវត្តបាលេលេយ្យ គណកម្មការចម្រុះមួយក្រុមនេះ នជួបប្រជុំគ្នាជាលើកចុងក្រោយ ដើម្បីពិភាក្សា



ប្រធានកិត្តិយសព្រះគ្រូចៅអធិការ សែម សុឃឿន

ក្រៅពីនោះចំពោះអ្វីដែលជាឧបសគ្គក្នុងការរាំខ្ទប់អង្គមិទ្ទិញមិនឱ្យរកច្រកចេញឃើញ ហើយតែងតែជាចំណុចខ្វែងគំនិតគ្នាតាំងតាំងពីដើមដំបូង គឺនៅត្រង់បច្ច័យដែលបានពីធ្វើបុណ្យ នឹងត្រូវធ្វើយ៉ាងម្តេចជាបន្ទាប់?។ មកដល់ចំណុចនេះ អ្នកចូលរួមប្រជុំម្នាក់បានបញ្ចេញនូវទស្សនៈថា : បច្ច័យទាំងនោះគួរតែជួយដល់អ្នកស្លាប់ដែលនៅក្នុងហេតុការណ៍ស្ពានកោះពេជ្រដោយការផ្ញើរទៅកាន់កាកបាទក្រហមខ្មែរ ឬក៏តាមមូលនិធិបាយ័ន្ត។ អំពីការរកច្រកចេញដោះស្រាយ និងស្វែងរកនូវរូបមន្តល្អមួយ ដើម្បីឈានដល់ការឯកភាពក្នុងការផ្ញើរបច្ច័យសល់ពីការធ្វើបុណ្យនោះ ដោយពុំមានការកេងយកចំណេញផ្នែកនយោបាយពីសំណាក់ក្រុមណាមួយឡើយ។ គេរំពៃចាំមើលថា តើស្ថាប័ន ឬអង្គការណាមួយដែលឯករាជ្យ និងជាទីទុកចិត្តសម្រាប់គណកម្មការចម្រុះមួយ ដែលផុសចេញពីការរួមគ្នាជាច្រើនក្រុម ច្រើនបក្សនេះ៕

KhmerPost LLC
East Coast Publication

**Pin Samkhon,**
*Publisher & Editor-in-Chief*
Email: pinsamkhon@gmail.com
*Staff Writers:* **Loeum Im,**
**Eda Uong, Audria Chea, Sovan Heng**

*Contributed Writers:*
**Mam Yin, Kim Phien,**
**Lanica Angpak, & Dannely Sam**
KhmerPostLowell@gmail.com

**Soben Pin**
*Marketing Director*
KhmerPostUSA@gmail.com
**267-253-3947**
**Sam Khoeun**
*Sales Consultant*
**(781) 244-0522**

*Design Staffs:*
**Leang Heng & Doch Vuthy**
*Distributor:* ***Chharly Young***

~~~~~

KhmerPost LLC is an independent newpaper that aims to facilitate mass communication among the Cambodian communities, their neighboring communities, and families. We aim to address local, community, and national news; and give an insight into Cambodia & global news. We also strive to bridge the language and cultural gaps and reduce social isolation by publishing in Khmer & English.
It published twice a month in Pennsylvanian & Massachusett.

~~~~

Semimonthly edition subscription is available within the U.S. & Canada at $60.00 and 70 Euros in Europe per year. Money order or check is accepted and made payable to:
U.A.M.G.
P.O. Box 24357
Philadelphia, Pa 19120

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ព័ត៌មានប្រែសម្រួលពីកាសែតអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃសុក្រ ទី២១ ខែមករា ឆ្នាំ២០១១

# Hun Sen Says No Tunisia Upheaval Here

By Phorn Bopha
THE CAMBODIA DAILY

In a speech yesterday, Prime Minister Hun Sen warned other political parties that last week's upheaval in Tunisia would not be repeated here and said he hoped for the death of the political opposition.

"Now there are people insulting me that I am in a position for so long," Mr Hun Sen said at the opening of a hospital facility in Kompong Cham province. "Long or short, it does not depend on me but depends on the people."

Apparently referring to recent comments reportedly made by Brad Adams, executive director of Human Rights Watch's Asia division, Mr Hun Sen rejected criticism that he had been in power "too long and that makes the other party weaker."

"If you don't understand it, don't say it," the premier said. He also repeatedly said he was working toward the utter disappearance of opposition parties.

"I govern not only to make the opposition party and group weak but to make the opposition group die," he said. "If there were no Hun Sen's palm, would Pol Pot have disappeared?"

Referring to protests in Tunisia, Mr Hun Sen said that he would take strong action if any such demonstrations were to happen in Cambodia.

"I would like to tell you that if you want to have a strike as in Tunisia, I will close the door and beat the dog this time," the premier said.

Zine al-Abidine Ben Ali, Tunisia's authoritarian president, was forced to step down on Jan 14, chased out of office by popular protests against corruption.

Kem Sokha, president of the opposition Human Rights Party, said yesterday that Cambodia needed opposition parties to remain a democracy.

"When he kills the opposition group, kills the political party and kills those who oppose, he kills democracy. There is no opposition party, there is no democracy," Mr Sokha said.

The HRP leader added that Mr Hun Sen would not be able to silence those who love Cambodia.

"He can silence the opposition but not the nationalists," Mr Sokha said. "I believe that the nationalists will never die. During all the time that repression has taken place, there are always people who stand up."

Keo Phirum, Cabinet chief for the Sam Rainsy Party, declined to comment, referring questions to a party spokesperson and SRP President Sam Rainsy, who could not be reached. Members of the SRP are meeting in Manila this week with Mr Rainsy, who has been abroad to avoid imprisonment for criminal convictions he denounces as politically engineered.

CPP lawmaker Cheam Yeap said yesterday that Mr Hun Sen's comments were about beating other parties in elections.

"I believe that whenever we have Prime Minister Hun Sen as deputy chairman of the CPP party, we still win," Mr Yeap said. "We create the party to compete to rule the country and the people. If we create and we don't rule, why did we bother to create it?"

Phay Siphan, spokesman for the Council of Ministers, declined to comment on Mr Hun Sen's speech, saying he had not heard it. But he said that, in general, the government needed a "credible" and "accountable" political opposition.

"They have to play an important role as the democratic or open society needs," Mr Siphan said. "We don't need the opposition party to insult people, to harass people, to call people names."

Mr Siphan added that both the SRP and HRP are guilty of these faults.

Mr Adams of Human Rights Watch could not be reached.

*(Additional reporting by Clancy McGilligan)*

CORRECTION: Due to an editorial error, yesterday's story on Metfone's revenues (p 30) incorrectly stated that they nearly tripled. Reportedly, they nearly quadrupled, rising by 280 percent.

# លោក ហ៊ុនសែន និយាយថាគ្មានភាពចលាចលនៅកម្ពុជាដូចទុយនីស៊ីទេ

ដោយ ផន បុប្ផា
THE CAMBODIA DAILY



នៅក្នុងសន្ទរកថាមួយកាលពីម្សិលមិញ លោកនាយករដ្ឋមន្ត្រី ហ៊ុន សែន បានព្រមានគណបក្សនយោបាយដទៃទៀតថា ភាពចលាចលកាលពីសប្តាហ៍មុននៅក្នុងប្រទេសទុយនីស៊ី នឹងមិនកើតឡើងនៅកម្ពុជាទេ ហើយបានមានប្រសាសន៍ថា លោកសង្ឃឹមថា បក្សប្រឆាំងនឹងស្លាប់ ។

លោក ហ៊ុន សែន បានមានប្រសាសន៍នៅពិធីសម្ពោធអគារមន្ទីរពេទ្យមួយនៅក្នុងខេត្តកំពង់ចាមថា "ឥឡូវនេះ មានអ្នកជេរខ្ញុំថា ខ្ញុំកាន់អំណាចយូរពេក ។ យូរឬឆាប់មិនចំណុះលើខ្ញុំទេ គឺចំណុះលើប្រជាពលរដ្ឋ" ។

ដោយទំនងជាសំដៅដល់ការអត្ថាធិប្បាយថ្មីៗដែលធ្វើឡើងដោយលោក ប្រេដ អាដាម នាយកប្រតិបត្តិប្រចាំតំបន់អាស៊ីនៅអង្គការឃ្លាំមើលសិទ្ធិមនុស្សលោក ហ៊ុន សែន បានច្រានចោលការរិះគន់ ដែលថាលោកកាន់អំណាច "យូរពេក ហើយធ្វើឱ្យបក្សដទៃទៀតចុះខ្សោយ" ។

លោកនាយករដ្ឋមន្ត្រីបានមានប្រសាសន៍ថា "បើមិនដឹងទេកុំនិយាយ" ។ លោកបានមានប្រសាសន៍ម្តងហើយម្តងទៀតថា លោកនឹងធ្វើឱ្យបក្សប្រឆាំងរលាយទាំងស្រុង ។

លោកមានប្រសាសន៍ថា "ខ្ញុំដឹកនាំមិនត្រឹមតែ ធ្វើឱ្យបក្សប្រឆាំង និងក្រុមនេះចុះខ្សោយប៉ុណ្ណោះទេ គឺធ្វើឱ្យក្រុមប្រឆាំងងាប់តែម្តង ។ បើគ្មានបាតដៃ ហ៊ុន សែន ទេ ស្មានតែ ប៉ុល ពត រលាយឬ?" ។

ដោយសំដៅដល់ការតវ៉ានៅនៅក្នុងប្រទេសទុយនីស៊ី លោក ហ៊ុន សែន បានមានប្រសាសន៍ថា លោកនឹងចាត់វិធានការខ្លាំងក្លាប្រសិនបើមានការតវ៉ាណាមួយដូចនេះកើតឡើងនៅកម្ពុជានោះ ។

លោកនាយករដ្ឋមន្ត្រីបានមានប្រសាសន៍ថា "ខ្ញុំសូមប្រាប់អ្នកឯងថា បើអ្នកឯងចង់ឱ្យមានកូដកម្មដូចនៅទុយនីស៊ី ខ្ញុំនឹងបិទទ្វារ ហើយវាយឆ្កែពេលហ្នឹងតែម្តង" ។

លោក Zine El Abidine Ben Ali ប្រធានាធិបតីផ្តាច់ការនៅប្រទេសទុយនីស៊ី ត្រូវបានបង្ខំឱ្យចុះចេញពីតំណែងកាលពីថ្ងៃទី១៤ ខែមករា ដោយការតវ៉ារបស់ប្រជាជនប្រឆាំងនឹងអំពើពុករលួយ ។

លោក កឹម សុខា ប្រធានគណបក្សសិទ្ធិមនុស្ស ដែលជាគណបក្សប្រឆាំងបានមានប្រសាសន៍កាលពីម្សិលមិញថា ប្រទេសកម្ពុជាចាំបាច់ត្រូវមានបក្សប្រឆាំងដើម្បីនៅជាប្រទេសប្រជាធិបតេយ្យ ។

លោក កឹម សុខា បានមានប្រសាសន៍ថា "នៅពេលលោក ហ៊ុន សែន សម្លាប់ក្រុមប្រឆាំង សម្លាប់បក្សនយោបាយនោះ និងសម្លាប់អ្នកដែលប្រឆាំង លោកសម្លាប់អ្នកប្រជាធិបតេយ្យហើយ ។ គ្មានបក្សប្រឆាំង គឺគ្មានប្រជាធិបតេយ្យទេ" ។

មេដឹកនាំគណបក្សប្រឆាំងរូបនេះបានបន្ថែមថា លោក ហ៊ុន សែន នឹងមិនអាចបំបិទមាត់អ្នកដែលស្រឡាញ់កម្ពុជាបានទេ ។ លោក កឹម សុខា បាន មានប្រសាសន៍ថា "លោក ហ៊ុន សែន អាចបំបិទមាត់អ្នកប្រឆាំងបាន តែមិនអាចបំបិទមាត់អ្នកជាតិនិយមបានទេ ។ ខ្ញុំជឿថា ក្រុមអ្នកជាតិនិយមនឹងគ្មានថ្ងៃស្លាប់ទេ ។ នៅពេលណាដែលមានការគាបសង្កត់តែងតែមានអ្នករើបម្រះហើយ" ។

លោក កែវ ភិរម្យ ប្រធានខុទ្ទកាល័យគណបក្ស សម រង្ស៊ី បានបដិសេធមិនធ្វើអត្ថាធិប្បាយទេ ដោយបង្វែរសំណួរទៅអ្នកនាំពាក្យគណបក្ស និងលោក សម រង្ស៊ី ប្រធានគណបក្ស ដែលគេមិនអាចទាក់ទងបាន ។ សមាជិកគណបក្សប្រឆាំងនឹងជួបជុំគ្នានៅទីក្រុងម៉ានីល នៅសប្តាហ៍នេះជាមួយលោក សម រង្ស៊ី ដែលកំពុងស្ថិតនៅក្រៅប្រទេស ដើម្បីជៀសពីការជាប់ពន្ធនាគារដោយសារការកាត់ទោសពីបទព្រហ្មទណ្ឌ ដែលលោកច្រានចោលថា ជាការរៀបចំបែបនយោបាយ ។

លោក ជាម យ៉ៀប សមាជិកសភាគណបក្ស ប្រជាជនកម្ពុជាបានមានប្រសាសន៍កាលពីម្សិលមិញថា ការអត្ថាធិប្បាយរបស់លោកនាយករដ្ឋមន្ត្រី ហ៊ុន សែន គឺសំដៅលើការយកឈ្នះបក្សដទៃទៀតនៅក្នុងការបោះឆ្នោត ។

លោក ជាម យ៉ៀប បានមានប្រសាសន៍ថា "ខ្ញុំ ជឿថា ដរាបណាយើងមានលោកនាយករដ្ឋមន្ត្រី ហ៊ុន សែន ជាអនុប្រធានគណបក្សប្រជាជនកម្ពុជា យើងនឹងនៅតែឈ្នះ ។ យើងបង្កើតគណបក្សដើម្បី ប្រកួតប្រជែងដឹកនាំប្រទេស និងប្រជាពលរដ្ឋ ។ បើយើងបង្កើតហើយមិនបានដឹកនាំ តើយើងបង្កើតដើម្បីអ្វី?" ។

លោក ផៃ ស៊ីផាន អ្នកនាំពាក្យទីស្តីការគណៈរដ្ឋមន្ត្រីបានបដិសេធមិនធ្វើអត្ថាធិប្បាយអំពីសុន្ទរក ថារបស់លោកនាយករដ្ឋមន្ត្រី ហ៊ុន សែន ទេ ដោយថ្លែងថា លោកមិនទាន់បានស្តាប់សុន្ទរកថានោះទេ ។ ប៉ុន្តែលោកបានមានប្រសាសន៍ថា ជាទូទៅរដ្ឋាភិបាលត្រូវការបក្សប្រឆាំង " ដែលគួរឱ្យជឿថា" និង "មានការទទួលខុសត្រូវ" ។

លោកផៃ ស៊ីផាន បានមានប្រសាសន៍ថា "ពួកគេត្រូវដើរតួនាទីសំខាន់ដូចដែលសង្គមប្រជាធិបតេយ្យ និងសេរីត្រូវការ ។ យើងមិនត្រូវការបក្សប្រឆាំងដែលជេរគេជេរឯង យាយីគេឬប្រមាថគេនោះទេ" ។

លោក ផៃ ស៊ីផាន បានបន្ថែមថា ទាំងគណបក្ស សម រង្ស៊ី និងគណបក្សសិទ្ធិមនុស្សសុទ្ធតែមានកំហុសទាំងនេះ ។ គេមិនអាចអាចទាក់ទងលោក ប្រេដ អាដាម នៅអង្គការឃ្លាំមើលសិទ្ធិមនុស្សបានទេ ។

*(រាយការណ៍បន្ថែមដោយ Clancy McGilligan)*

# 2010 Budget Correction Approved by the Senate

The Senate yesterday approved a correction to the 2010 budget authorizing government borrowing of more than $300 million from Japan, China and South Korea to cover cost overruns from previous years. It was passed by the National Assembly on Dec 27. A seven-page statement, submitted with the draft law to the Assembly by Prime Minister Hun Sen in December, said the additional loans were necessary to meet 2009 and 2010 deficits caused by the global financial crisis, natural disasters and the threat of war. Oum Sarith, secretary-general of the Senate, said yesterday that the budget amendment "was ratified by 57 of 58 votes." He added that three senators were absent from proceedings, while one other was in the bathroom at the time of the vote. The Senate yesterday also ratified the Asean transport services agreement and the Asean-India free-trade agreement, Mr Sarith said. Meanwhile, a release issued by the Senate yesterday announced that the next Senate election would be held Jan 29, 2012. *(Neou Vannarin)*

# ការកែប្រែថវិកាជាតិឆ្នាំ២០១០ត្រូវបានអនុម័តដោយព្រឹទ្ធសភា

ដោយ នៅ វណ្ណារិន
THE CAMBODIA DAILY

កាលពីម្សិលមិញ ព្រឹទ្ធសភាបានអនុម័តលើការកែប្រែចំពោះច្បាប់ថវិកាឆ្នាំ២០១០ ដែលអនុញ្ញាតឱ្យរដ្ឋាភិបាលខ្ចីលុយជាង៣០០លានដុល្លារពីប្រទេស ជប៉ុន ចិន និងកូរ៉េខាងត្បូងដើម្បីបំពេញការចំណាយលើសចំនួនកាលពីឆ្នាំមុនៗ ។ ច្បាប់នេះត្រូវបានអនុម័តដោយរដ្ឋសភាកាលពីថ្ងៃទី២៧ខែធ្នូ ។ របាយការណ៍មួយដែលមាន៧ទំព័រ ដែលត្រូវបានដាក់ជូនទៅរដ្ឋសភារួមជាមួយសេចក្តីព្រាងច្បាប់នេះ ដោយលោកនាយករដ្ឋមន្ត្រី ហ៊ុន សែន កាលពីខែធ្នូនោះបានលើកឡើងថា កម្ចីបន្ថែមទាំងនេះចាំបាច់ក្នុងការឆ្លើយតបនឹងឱនភាពនៅឆ្នាំ២០០៩ និងឆ្នាំ២០១០ ដែលបង្កឡើងដោយវិបត្តិហិរញ្ញវត្ថុពិភពលោក គ្រោះធម្មជាតិ និងគំរាមកំហែងពីសង្គ្រាម ។ លោក អ៊ុំ សារិទ្ធ ជាអគ្គលេខាធិការព្រឹទ្ធសភាបានមានប្រសាសន៍កាលពីម្សិលមិញថា វិសោធនកម្មច្បាប់ថវិកានេះ" ត្រូវបានបោះឆ្នោតគាំទ្រដោយសំឡេង ៥៧លើ៥៨" ។ លោកបានបន្ថែមថា សមាជិកព្រឹទ្ធសភា៣រូបអវត្តមានពីនីតិវិធីនេះ រីឯមួយរូបទៀតស្ថិតនៅក្នុងបន្ទប់ទឹកនៅពេលបោះឆ្នោតនោះ ។ កាលពីម្សិលមិញព្រឹទ្ធសភាក៏បានផ្តល់សច្ចានុម័តលើកិច្ចព្រមព្រៀងសេវាអាស៊ាន និងឥណ្ឌាផងដែរ នេះបើតាមប្រសាសន៍របស់លោក អ៊ុំ សារិទ្ធ ។ ទន្ទឹមនឹងនេះដែរ សេចក្តីប្រកាសព័ត៌មានដែលព្រឹទ្ធសភាបានចេញកាលពីម្សិលមិញ បានប្រកាសថា ការបោះឆ្នោតព្រឹទ្ធសភាលើកក្រោយនឹងត្រូវប្រារព្ធធ្វើនៅថ្ងៃទី២៩ ខែមករា ឆ្នាំ២០១២ ៕

# ចៅអធិការវត្តអង្គរជុំ គេចខ្លួនព្រោះរឿងស្រី

**យូស្តុន, តិចសាស់ :** ចៅអធិការវត្តថ្មីថ្មោងមួយឈ្មោះ អង្គរជុំ បានត្រូវប៉ូលិសរកចាប់ខ្លួនពីបទរំលោភលើរូបការយុវនារីពីររូប ជាសិស្សវិទ្យាល័យ អាយុ១៦ឆ្នាំ និងអាយុ១៧ឆ្នាំម្នាក់ទៀត។ ចៅ


Venerable Por Venh, Chief Monk

អធិការនោះឈ្មោះ ប៉ោ វិន អាយុ៤១ឆ្នាំ ធ្លាប់បានគង់នៅវត្ត ខេមរ៉ារ៉ាម ជាចៅអធិការ តែដល់ចាញ់ក្ដីគណៈកម្មាធិការវត្ត ដែលហាមលោកមិនឱ្យមានសកម្មភាពអាណាចក្រ ឱ្យមានតែពុទ្ធចក្រ ហើយមួ យទៀតគណៈកម្មាធិការវត្ត ដែលលោកពេញចិត្តបានចាក់ចាញ់ឆ្នោត អ្នកស្រី សុខ សុរិយា បានជាប់ជាប្រធាន បានចាកចេញពីវត្តខេមរ៉ារ៉ាម ទៅទិញវត្តមួយទៀតជាមួយគណៈកម្មាធិការសម្លាញ់ចិត្តរបស់លោក កាលពីបីឆ្នាំមុន ហើយឱ្យឈ្មោះថា "វត្តអង្គរជុំ"។ នាឱកាសនេះ ព្រះសង្ឃរូបនោះ បានលបគេចខ្លួនទៅប្រទេសកម្ពុជា កាលពីថ្ងៃទី២៩ ខែធ្នូ ឆ្នាំ២០១០ ហើយយើងបានទទួលព័ត៌មានថា លោក ប៉ោ វិន បានលាចាកសិក្ខាបទនៅវត្តមួយនៃខេត្តសៀមរាបរួចហើយ។

ទូរទស្សន៍ NBC និងសារព័ត៌មានជាច្រើន នៅយូស្តុន បានបញ្ចេញសេចក្ដីរាយការណ៍ដ៏អាម៉ាស និងដ៏សំខាន់មួយនេះ ដោយនិយាយថា "វិន័យសង្ឃមិនអនុញ្ញាតឱ្យមានការរួមភេទ ហើយបើមាន នឹងត្រូវបរាជិកអស់មួយជីវិត"។ រឿងដែលអាស្រូវនេះបានលេចឮឡើង នៅពេលដែលយុវនារីក្មេងខ្ចីនោះបានដឹងថា លោកសង្ឃកម្លោះនោះ បានរួមជាស្ត្រីម្នាក់ទៀតធ្វើឱ្យនាងមានការឈឺចាប់ រហូតដល់ចង់ធ្វើអត្តឃាត បើតាមសេចក្ដីរាយការណ៍ យូស្តុន ក្រូរីកុល។ នាងបានរាយការណ៍ប្រាប់ ស្ទេរីហ្វ ហារីស គោងទី កាលពីថ្ងៃទី១០មករាកន្លងទៅថា នាងទៅវត្តតាមម្ដាយ ដែលយកចង្ហាន់ប្រគេនព្រះសង្ឃ ចម្អិនចង្ហាន់ និងបោសសំអាតវត្ត នាងបានរួមភេទជាមួយបុរសស្បៀកស្បង់នោះ នៅក្នុងបន្ទប់របស់បុរសជាសង្ឃនោះ នេះបើយោងទៅតាមឯកសាររបស់តុលាការ។

ប៉ោ វិន បានទុកលិខិតមួយជូនគណៈកម្មាធិការវត្ត នាថ្ងៃទី២២ ខែធ្នូ ដោយខ្លឹមសារថា "ខ្ញុំព្រះករុណាអាត្មាភាពសូមលាហើយ គ្មានពេលបានត្រឡប់មកវិញទេ"។ រីឯគណៈកម្មាធិការវត្ត បានដឹងរឿងរ៉ាវនេះ ជាមុន តែពុំបានចាត់វិធានការណ៍តាមវិន័យជាសាធារណៈណាមួយទេ នេះបើតាមន័យលិខិតរបស់ ប៉ោ វិន ។ យើងមិនទាន់ដឹងថា រឿងអាស្រ័យនេះអាចនឹងរាលដាល់ដល់អ្នកដែលឃុបឃិត ឬមិនដល់នៅឡើយទេនៅពេលនេះ៕ (សូមអានអត្ថបទជាភាសាអង់គ្លេសទំព័រទី១២)

# សមាគម COVTA ដឹកនាំប្រារព្ធពិធីបុណ្យចូលឆ្នាំសកល

**ឡូវែល :** កាលពីរាត្រីថ្ងៃសៅរ៍ទី១ខែមករា ឆ្នាំ២០១១ ស្ថិតនៅសាលមហោស្រពសំពៅមាសមានការប្រារព្ធពិធីបុណ្យចូលឆ្នាំសកល ដែលបានដឹកនាំដោយលោក ម៉ឹង សុផ្លាណាត់ ប្រធានសមាគមសង្គមអប់រំវិជ្ជាជីវៈសម្រាប់ក្មេងកំព្រាខ្មែរ ហៅកាត់ថា COVTA ប្រចាំទីក្រុងឡូវែល ។ ឥស្សរៈជនដែលបានអញ្ជើញចូលរួមនៅក្នុងរាត្រី នោះត្រូវបានគេស្គាល់ថា "ឥស្សរៈជននយោបាយមកពីគ្រប់គណបក្ស ,ពាណិជ្ជករ, បុគ្គលិកមន្ត្រីរាជការខ្មែរអាមេរិកកាំង, អគ្គកុងស៊ុលខ្មែរប្រចាំទីក្រុងឡូវែល និងតារាប្រដាល់ជំរើសជាតិប្រចាំព្រះរាជាណាចក្រកម្ពុជា គឺលោក នួន សូរិយា" (កីឡាប្រដាល់ដ៏ល្បីឡាញរបស់ខ្មែរ ដែលបានមកសហរដ្ឋអាមេរិក មុនគេបង្អស់) "។ បើតាមលោក អ៊ូ សុវណ្ណ (អគ្គកុងស៊ុលខ្មែរប្រចាំឡូវែល) បានមានប្រសាសន៍នៅក្នុងពិធីនោះថា "រីករាយថ្ងៃបុណ្យចូលឆ្នាំសកល, ខ្ញុំសូមជូនពរបងប្អូនខ្មែរ-អាមេរិកាំងទាំងអស់បានទទួលនូវសេចក្តីសុខសាន្តឆ្នាំថ្មីអ្វីៗថ្មី, គំនិតថ្មី, មិត្តថ្មី។ លោកក៏បានបន្តទៀតថា ឆ្នាំថ្មីហើយយើងត្រូវបំភ្លេចចោលឱ្យអស់នូវរឿងរ៉ាវនានា ដែលបានកើតឡើងក្នុងឆ្នាំចាស់ ហើយទាំងអស់គ្នាត្រូវគិតគូរធ្វើអ្វីៗដែលថ្មី និងធ្វើការរួមគ្នា ដើម្បីទទួលបានការរីកចំរើនទាំងអស់គ្នា។ រីឯលោក នួន សូរិយា បានមានប្រសាសន៍នាឱកាសនោះថា "ខ្ញុំសប្បាយចិត្តឥតឧបមាដែលបានមកចូលរួមជាភ្ញៀវកិត្តិយស ដែលតំណាងឱ្យកីឡាករកីឡាការិនីប្រដាល់ទាំងអស់ប្រចាំនៅប្រទេសកម្ពុជា ដើម្បីមកចូលរួមក្នុងឱកាសបុណ្យចូលឆ្នាំសកល២០១១នេះ។ ខ្ញុំមានសំណាងណាស់ដែលសហព័ន្ធកីឡាប្រដាល់ខ្មែរ-អាមេរិកកាំងបានជ្រើសរើសយកខ្ញុំមកធ្វើជាគ្រូបង្ហាត់ប្រដាល់ដល់កូនខ្មែរប្រចាំទីក្រុងនេះ ។ ខ្ញុំសូមជូនពរដល់បងប្អូនទាំងអស់គ្នា បានសេចក្តីសុខគ្រប់ពេលវេលា និងទទួលបានជោគជ័យលើគ្រប់ភារកិច្ចទាំងអស់ក្នុងឆ្នាំថ្មីនេះ។" ក្នុងរាត្រីដ៏សប្បាយរីករាយនេះផងដែរ ក៏មានការសំដែងរបាំជូនពរ និងការរាំចង្វាក់ Hip Hop ជាក្រុមលាឡំ និងរបាំបាឡេ ដែលសំដែងដោយសមត្ថភាពដោយក្រុមកូនខ្មែរ-អាមេរិកាំង មកពីវិទ្យាល័យ Lowell High School ដើម្បីរៃអង្គាសប្រាក់ជួយដល់ក្មេងកំព្រាអនាថា និងប្រជាពលរដ្ឋក្រីក្រនៅតាមព្រំដែនខ្មែរ ខេត្តឧត្តមានជ័យ ។ ថវិកាដែលទទួលបានមានចំនួន ៥៣៦៧ដុល្លារ ដែលបានមកពីទឹកចិត្តជ្រះថ្លារបស់បងប្អូនខ្មែរយើងទាំងអស់ប្រមាណជា៨០០រយនាក់បានចូលរួមក្នុងរាត្រីនោះ។ ពិធីខាងលើត្រូវបានបញ្ចប់នៅម៉ោង១២:៣០នាទីរំលងអាធ្រាត្រស្ថិតក្នុងបរិយាកាសដ៏អឹកធឹកគួរជាទីមោទនៈ៕

**អ៊ីជា អ៊ួង**









# COMMUNITIES COME TOGETHER TO CELEBRATE DR. KING AND AFFIRM THEIR POWER TO MAKE SOCIAL CHANGE

*By Mia-lia Kiernan*

Monday, January 17th - Martin Luther King Day, 2011, marks the 119th day of incarceration of four upstanding Philadelphia community members by Immigration and Customs Enforcement (ICE) for deportation to Cambodia on the basis of prior criminal acts committed in their youth, for which all four have already served their time. One of these men, Chally Dang, was a 15 year old boy when he was convicted of aggravated assault and charged as an adult. He served his time in juvenile, then adult prison, and had been released to the community a reformed man at the age of 21. Now he is almost 30, a father to four children, a homeowner in Northeast Philadelphia, a tax-paying computer mechanic, and a loving husband. He was taken into ICE custody on September 21, 2010 and faces deportation to Cambodia, the country he fled with his mother as an infant. His children now face the possibility of growing up in Philadelphia without their father.









As the community thinks about this injustice, they also consider the history of injustice and the fight for social change in America. The community stands in solidarity with all those affected by unjust laws to raise awareness of the struggles they face together, to remember those who fought to make this world better for us, and to rejoice in their power to make this world better for our children. *Numbers of the organizations and activists were joined together include of Philadelphia City Councilor Candidate, Andy Toy, Philadelphia Student Union activists for the Campaign for Nonviolent Schools, Central High School's Students Against Unjust Deportation, Asian Student Association of Philadelphia, United Taxi Workers Alliance, Philadelphia's DREAM activists, Media Mobilizing Project's Telling of Untold Stories, One Love Movement to Keep Families Together,* and many other community activists working for social change in Philadelphia.

On Monday, MLK Day, the Philadelphia community celebrated Dr. King's legacy as they fight for the life and liberty of the next generation.

The Rally began by meeting and Student Performance, Speeches, Singing, Armband Ceremony at the Arch Street United Methodist Church, 55 North Broad Street where Sign and Message Ribbon were being made. The crowds made their statement by marching one and half mile in the center of city of Philadelphia, the busiest Broad St, the Immigration and Customs Enforcement (ICE) Building, 16th and Callowhill. Message Ribbons were left behind to express their messages in front of the ICE building.



On April 16, 1963, Martin Luther King Jr. wrote a Letter from Birmingham Jail. In it he wrote: "How does one determine whether a law is just or unjust? A just law is a man-made code that squares with the moral law or the law of God. An unjust law is a code that is out of harmony with the moral law. Any law that uplifts human personality is just. Any law that degrades human personality is unjust."

"I entered the United States as an infant, made my mistakes as a juvenile and was punished for those mistakes as a young adult. And as I now embrace life as a reformed, tax-paying civilian, the actions of my past still haunt me with what my fate might be. I can only implore mercy from a system in which I trust forgiveness and second chances still exist." Chally Dang, Letter from York County Prison, December 4, 2010. To learn more about the movement, please contact. Mia-lia Kiernan at 215 313 9298/ mialiabk @gmail.com



## Buddhist Monk Accused Of Rape Has Fled to Cambodia

*Staff Writer: Audria Chea*

For the first time a Cambodian American community allow public speaking about a rape case against a Buddhist monk. During the week of January 16-22 there have been a media coverage through Houston Chronicle and ABC 13 Eyewitness News that broke, what normally a forbidden secrete in the




Cambodian tradition with matter relating to the Buddhist monk. Cambodian culturally demonstrate a high respect for

*(Continued to page16)*

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ដំណឹងប្រែសម្រួលពីកាសែតអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃសុក្រ ទី២១ ខែធ្នូ ឆ្នាំ២០១១

# Closed-Door Meeting on Draft Union Law Ends After 3 Days

By Khuon Narim and Zsombor Peter
THE CAMBODIA DAILY

Behind closed doors yesterday, government officials, union representatives and employers wrapped up a three-day meeting on a draft law that aims to regulate the country's trade unions.

If approved, it would mark the first major revision of the country's 1997 Labor Law. As it stands, the draft requires unions to register and file regular financial reports.

It would also give the government the authority to suspend and dissolve unions. But unions have called the requirements onerous and the government's proposed new powers a threat to their independence.

Some have also complained that the draft included few of the amendments recommended after a similar meeting with the government last year, and expressed concern that this round would prove no different.

"If they [the government] think about the workers' rights...they will change," Ath Thon, president of the Cambodian Labor Confederation, said yesterday. "If they don't feel like this, I don't know."

Others were more pessimistic.

"I think it was only a show for international observers and NGOs," Free Trade Union president Chea Mony said afterward. "If we have a thousand more meetings, the government will still oppose the unions' recommendations."

Despite a promise of permission to attend the meeting from Labor Ministry Undersecretary of State Sath Samuth, reporters were barred from the discussion by event staff who refused to identify themselves.

But during a break in the meeting, Mr Samuth defended the draft.

"In my opinion, all of the unions only see one corner" of the law, he said. "Everything is OK."

He said the ministry would still consider any recommendations from the unions that did not confer undue advantage to any side.

"We do not deny all their requests, only those providing advantage to employers or employees, because the government is an arbitrator and seeks compromise between them," he said.

After any additional changes, he said, the government would send the draft to Geneva for recommendations from the International Labor Organization.

# កិច្ចប្រជុំសម្ងាត់ស្តីពីសេចក្តីព្រាងច្បាប់សហជីពបញ្ចប់ក្រោមរយៈពេល៣ថ្ងៃ

ដោយ ឃួន ណារីម និង Zsombor Peter
THE CAMBODIA DAILY

កាលពីម្សិលមិញក្រុមមន្ត្រីរដ្ឋាភិបាល ក្រុមអ្នកតំណាងសហជីព និងនិយោជកនានាបានបញ្ចប់កិច្ចប្រជុំសម្ងាត់រយៈពេល៣ថ្ងៃ ស្តីពីសេចក្តីព្រាងច្បាប់មួយដែលមានបំណងធ្វើនិយ័តកម្មលើសហជីពនៅក្នុងប្រទេសនេះ ។

ប្រសិនបើត្រូវបានអនុម័ត វានឹងបង្ហាញពីការកែប្រែធំលើកទី១នៃច្បាប់ការងារឆ្នាំ១៩៩៧របស់ប្រទេសកម្ពុជា ។ ក្នុងទម្រង់បច្ចុប្បន្នរបស់វា សេចក្តីព្រាងច្បាប់នេះតម្រូវឱ្យសហជីពចុះបញ្ជីជាមួយរដ្ឋាភិបាល និងធ្វើរបាយការណ៍ហិរញ្ញវត្ថុជាប្រចាំ ។

ច្បាប់នេះក៏ផ្តល់អំណាចឱ្យរដ្ឋាភិបាលផ្អាក និងរំលាយសហជីពផងដែរ ។ ប៉ុន្តែសហជីពបានចាត់ទុកការតម្រូវនេះថា គួរឱ្យព្រួយបារម្ភ ហើយអំណាចថ្មីរបស់រដ្ឋាភិបាលដូចដែលបានស្នើឡើងនេះ ជាការគំរាមកំហែងឯករាជ្យភាពរបស់ពួកគេ ។

សហជីពមួយចំនួនក៏បានត្អូញត្អែរដែរថា សេចក្តីព្រាងច្បាប់នេះរាប់បញ្ចូលការកែប្រែមួយចំនួនតូច ប៉ុណ្ណោះនូវអ្វីដែលពួកគេបានផ្តល់អនុសាសន៍ ក្រោយពីមានកិច្ចប្រជុំស្រដៀងគ្នានេះជាមួយរដ្ឋាភិបាលកាលពីឆ្នាំមុន ហើយបានសម្តែងនូវកង្វល់ថា កិច្ចប្រជុំលើកនេះនឹងគ្មានអ្វីខុសគ្នាឡើយ ។

លោក អាត់ ធន ជាប្រធានសហភាពការងារកម្ពុជា បានមានប្រសាសន៍កាលពីម្សិលមិញថា "ប្រសិនបើពួកគេ (រដ្ឋាភិបាល) គិតអំពីសិទ្ធិរបស់កម្មករមែននោះ ពួកគេនឹងកែប្រែហើយ ។ ប្រសិនបើពួកគេមិនគិតដូច្នេះទេ ខ្ញុំមិនដឹងទេ" ។

អ្នកផ្សេងៗទៀតមានទុទិដ្ឋិនិយម កាន់តែខ្លាំង ។

លោក ជា មុនី ជាប្រធានសហជីពសេរីកម្មករបានមានប្រសាសន៍នៅពេលក្រោយមកថា "ខ្ញុំគិតថា វាគ្រាន់តែជាការសម្តែងឱ្យអ្នកអង្កេតការណ៍ និងអង្គការក្រៅរដ្ឋាភិបាលអន្តរជាតិមើលតែប៉ុណ្ណោះ ។ ប្រសិនបើយើងមានកិច្ចប្រជុំមួយពាន់ដងទៀត ក៏រដ្ឋាភិបាលនៅតែប្រឆាំងនឹងអនុសាសន៍របស់សហជីពដែរ" ។



ថ្វីបើមានការសន្យាផ្តល់អនុញ្ញាតឱ្យចូលរួមកិច្ចប្រជុំនេះពីលោក សាត សាមុត ជាអនុលេខាធិការក្រសួងការងារក៏ដោយ ក៏អ្នកយកព័ត៌មានត្រូវបានរារាំងដោយអ្នករៀបចំកម្មវិធីដែលបានបដិសេធមិនប្រាប់ឈ្មោះមិនឱ្យចូលរួមដែរ ។

ទោះជាយ៉ាងណា អំឡុងពេលសម្រាកពីកិច្ចប្រជុំនេះ លោក សាមុត បាននិយាយការពារសេចក្តីព្រាងច្បាប់នេះ ។

លោកបានមានប្រសាសន៍ថា "តាមយោបល់របស់ខ្ញុំ សហជីពទាំងអស់មើលឃើញតែជ្រុងមួយ" នៃច្បាប់ប៉ុណ្ណោះ ។ អ្វីៗគ្រប់យ៉ាងគឺល្អហើយ ។

លោកបានមានប្រសាសន៍ដោយមិនបញ្ជាក់ពីសេចក្តីលំអិតថា ក្រសួងនឹងនៅតែពិចារណាអនុសាសន៍របស់សហជីពដែលមិនលើកឡើងពីផលប្រយោជន៍មិនសមហេតុផលសម្រាប់ភាគីណាមួយនោះ ។

លោកបានមានប្រសាសន៍ថា "យើងមិនបដិសេធសំណើរបស់ពួកគេទាំងអស់នោះទេ គឺតែសំណើទាំងឡាយដែលផ្តល់ប្រយោជន៍ដល់និយោជក ឬនិយោជិកប៉ុណ្ណោះ ។ ពីព្រោះរដ្ឋាភិបាលជាអាជ្ញាកណ្តាល ហើយស្វែងរកការសម្របសម្រួលរវាងអ្នកទាំងពីរ ។

លោកបានមានប្រសាសន៍ថា ក្រោយពីមានការកែប្រែបន្ថែមទៀតហើយនោះ រដ្ឋាភិបាលនឹងបញ្ជូនសេចក្តីព្រាងច្បាប់នេះទៅទីក្រុងហ្សឺណែវ ដើម្បីសុំអនុសាសន៍ពីអង្គការពលកម្មអន្តរជាតិ ៕

# Gov't Touts Forest Crime Investigation Gains

By Paul Vrieze and Van Roeun
THE CAMBODIA DAILY

Forestry Administration officials sent 935 forestry crimes for prosecution during a nationwide crackdown last year, according to a report by the administration, a dramatic increase from the previous year's 66 cases.

The administration's annual report for 2010, released last week, said its officers investigated 1,507 crimes under the Forestry Law in 2010, 935 of which had been sent to the courts for prosecution. Forestry crimes include illegal logging, forest clearing, luxury wood smuggling and wildlife trade.

By comparison, the police recorded 3,456 criminal offenses nationwide in 2009.

The administration's law enforcement director, Tim Sipha, said yesterday that the sharp increase was a result of the national crackdown on forestry crimes, which began early last year with the public support of Prime Minister Hun Sen, who urged the pursuit of illegal loggers regardless of lightly, but he was promptly made undersecretary of state at the Ministry of Agriculture.

Pen Bonnar, coordinator for human rights group Adhoc in Ratanakkiri province, a hotspot for illegal logging, said he was skeptical of the Forestry Administration's reported successes.

"I don't see any big guys prosecuted, and the measures will not last long," he said. "The crackdown is not really serious, and it is on and off."

David Emmet, regional director of Conservation International, said the reported 1,500 cases of forest crimes represented a "really high number," while the 82 related arrests were a "good number for the year."

He added, however: "I would like to know what the breakdown is, how many [offenders] are villagers and how many are local and higher officials."

The arrest of any major players behind the illegal timber trade, Mr Emmet said, would require intense investigation by the police and the Anti-Corruption Unit. their public status.

The report said officials confiscated about 10,000 cubic meters of illegal timber across the country, while 3,320 cases of illegally traded wildlife were uncovered.

"There were strong measures from the campaign, with the Forestry Administration cooperating with the army for the law enforcement," Mr Sipha said, adding that 82 offenders were arrested by the administration in the past year.

"Some are in jail, some the court granted bail and some are under investigation," he said about the suspects. Mr Sipha could not specify if any government officials had been arrested for forest crimes last year.

Human rights organizations have long complained that the government's crackdowns fail to target high-ranking officials or ringleaders involved in the illegal timber trade, and therefore only temporarily slow it down.

In March, Forestry Administration chief Ty Sokhun was dismissed for taking his duties too

# រដ្ឋាភិបាលនិយាយថា ការស៊ើបអង្កេតលើបទល្មើសព្រៃឈើកើនឡើង

ដោយ Paul Vrieze និង វណ្ណ រឿន
THE CAMBODIA DAILY

យោងតាមរបាយការណ៍មួយរបស់រដ្ឋបាលព្រៃឈើបានឱ្យដឹងថា ក្រុមមន្ត្រីរក្សាប្រមាញ់បានបញ្ជូនបទល្មើសព្រៃឈើ៩៣៥ករណីអំឡុងការបង្ក្រាបទូទាំងប្រទេសកាលពីឆ្នាំមុនទៅតុលាការដើម្បីធ្វើការកាត់ទោស ដែលនេះជាការកើនឡើងដ៏ច្រើន បើប្រៀបធៀបទៅនឹងឆ្នាំមុនដែលមានតែ៦៦ករណី ។

របាយការណ៍ប្រចាំឆ្នាំ២០១០របស់រដ្ឋបាលព្រៃឈើដែលបានចេញផ្សាយកាលពីសប្តាហ៍មុនបានលើកឡើងថា មន្ត្រីរបស់ខ្លួនបានស៊ើបអង្កេតបទល្មើសចំនួន១.៥០៧ករណីក្រោមច្បាប់ស្តីពីព្រៃឈើឆ្នាំ ២០១០ ដោយ ៩៣៥ករណីនៅក្នុងចំណោមនោះ ត្រូវបានបញ្ជូនទៅតុលាការដើម្បីធ្វើការកាត់ទោស ។

បទល្មើសព្រៃឈើរួមមានការកាប់ឈើខុសច្បាប់ការរានព្រៃ ការរត់ពន្ធឈើប្រណិត និងការជួញដូរសត្វព្រៃ ។ បើធ្វើការប្រៀបធៀបនគរបាលបានកត់ត្រាថា មានបទល្មើសឧក្រិដ្ឋចំនួន៣.៤៥៦ករណីនៅទូទាំងប្រទេសក្នុងឆ្នាំ២០០៩ ។

លោក ទឹម ស៊ីផា ជាប្រធានផ្នែកអនុវត្តច្បាប់នៃរដ្ឋបាលព្រៃឈើបានមានប្រសាសន៍កាលពីម្សិលមិញថា បទល្មើសព្រៃឈើចំនួន៦៦ករណីត្រូវបានបញ្ជូនទៅតុលាការក្នុងឆ្នាំ២០០៩ ។ លោក ស៊ីផា បានមានប្រសាសន៍ថា ការកើនឡើងដ៏ច្រើននេះ គឺបណ្តាលមកពីការបង្ក្រាបបទល្មើសព្រៃឈើទូទាំងប្រទេសដែលបានចាប់ផ្តើមកាលពីដើមឆ្នាំមុន ដោយមានការគាំទ្រជាសាធារណពីលោកនាយករដ្ឋមន្ត្រី ហ៊ុន សែន ដែលបានជំរុញឱ្យមានការចាប់ខ្លួនអ្នកកាប់ឈើខុសច្បាប់មិនថា ពួកគេមានឋានៈជាអ្វីនោះទេ ។

របាយការណ៍នេះបានលើកឡើងថា ក្រុមមន្ត្រីបានរឹបអូសឈើខុសច្បាប់ប្រហែល១០.០០០ម៉ែត្រគូបទូទាំងប្រទេសខណៈដែលរកឃើញករណីជួញដូរសត្វព្រៃខុសច្បាប់ចំនួន៣.៣២០ករណី ។

លោក ស៊ីផា បានមានប្រសាសន៍ថា "មានវិធានការតឹងរ៉ឹងក្នុងយុទ្ធនាការនោះ ដែលរដ្ឋបាលព្រៃឈើបានសហការជាមួយកងទ័ពដើម្បីអនុវត្តច្បាប់" ដោយបានបន្ថែមថា ជនល្មើស១២នាក់ ត្រូវបានចាប់ខ្លួនដោយរដ្ឋបាលព្រៃឈើកាលពីឆ្នាំមុន ។

លោកបានថ្លែងអំពីជនសង្ស័យថា "ជនសង្ស័យមួយចំនួនកំពុងជាប់ពន្ធនាគារមួយចំនួនទៀតត្រូវបានតុលាការសម្រេចឱ្យនៅក្រៅឃុំបណ្តោះអាសន្ន និងមួយចំនួនទៀតកំពុងស្ថិតនៅក្រោមការស៊ើបអង្កេត" ។ លោក ស៊ីផា មិនបានបញ្ជាក់ថា តើមានមន្ត្រីរដ្ឋាភិបាលណាខ្លះដែលត្រូវបានចាប់ខ្លួនដោយសារបទល្មើសព្រៃឈើកាលពីឆ្នាំមុនទេ ។

អង្គការសិទ្ធិមនុស្សបានលើកឡើងជាយូរមក ហើយថាការបង្ក្រាបរបស់រដ្ឋាភិបាលមិនបានផ្តោតគោលដៅទៅលើក្រុមមន្ត្រីដែលមានឋានៈខ្ពស់ឬក៏មេខ្លោងដែលជាប់ពាក់ព័ន្ធនៅក្នុងការជួញដូរឈើខុសច្បាប់ទេ ដូច្នេះយើងវាគ្រាន់តែធ្វើឱ្យចុះថយជាបណ្តោះអាសន្នតែប៉ុណ្ណោះ ។

កាលពីខែមីនា លោក ទី សុខុន ប្រធានរដ្ឋបាលព្រៃឈើត្រូវបានដកចេញពីតួនាទីដោយសារការបំពេញភារកិច្ចបែបធូររលុងរបស់លោក ប៉ុន្តែលោកក៏ត្រូវបានផ្តល់តួនាទីជាអនុរដ្ឋលេខាធិការនៅក្រសួងកសិកម្មភ្លាមៗដែរ ។

លោក ប៉ែន បុណ្ណារ៍ អ្នកសម្របសម្រួលនៅអង្គការសិទ្ធិមនុស្សអាដហុកប្រចាំខេត្តរតនៈគិរី ដែលជាចំណុចក្តៅនៃការកាប់ឈើខុសច្បាប់បានមានប្រសាសន៍ថា លោកមិនមែនជឿលើរបាយការណ៍អំពីភាពជោគជ័យរបស់រដ្ឋបាលព្រៃឈើទេ ។

លោកបានមានប្រសាសន៍ថា "ខ្ញុំមិនជឿមានបុគ្គលធំដុំណាម្នាក់ត្រូវបានកាត់ទោសទេ ហើយវិធានការណ៍ទាំងនេះនឹងមិនយូរអង្វែងទេ ។ ការបង្ក្រាបនេះមិនហ្មត់ចត់ឡើយ គឺជួនធ្វើជួនអត់" ។ លោកបានបន្ថែមថា "វិធានការទាំងនេះត្រូវបានធ្វើឡើងនៅពេលដែលព្រៃឈើស្ទើរតែអស់ទៅហើយ" ។

លោក ដេវីត អេមម៉េត នាយកប្រចាំតំបន់នៅអង្គការអភិរក្សអន្តរជាតិ Conservation International បានមានប្រសាសន៍ថា បទល្មើសព្រៃឈើចំនួន១.៥០០ករណី ដូចដែលត្រូវបានរាយការណ៍គឺជា "តួលេខដ៏ខ្ពស់ពិតប្រាកដ" មួយចំណែកឯការចាប់ខ្លួន៨២ករណីដែលពាក់ព័ន្ធគឺជា "តួលេខមួយសម្រាប់ឆ្នាំនេះ" ។

ទោះជាយ៉ាងណា លោកបានបន្ថែមថា "ខ្ញុំចង់ដឹងអំពីសេចក្តីលំអិតតើជនល្មើសប៉ុន្មាននាក់ជាអ្នកភូមិ និងប៉ុន្មាននាក់ជាមន្ត្រីក្នុងមូលដ្ឋាន និងមន្ត្រី ដែលមានឋានៈខ្ពស់" ។

លោក អេមម៉េត បានមានប្រសាសន៍ថា ការចាប់ខ្លួនមនុស្សសំខាន់ដែលដែលនៅពីក្រោយការជួញដូរឈើខុសច្បាប់តម្រូវឱ្យមានការស៊ើបអង្កេតហ្មត់ចត់ដោយនគរបាល និងអង្គការប្រឆាំងអំពើពុករលួយ ។ លោកបានបន្ថែមថា "គេធ្វើបែបនេះនៅក្នុងប្រទេសថៃ ។ នៅកម្ពុជាពិបាកធ្វើណាស់ ៕



# ពីរដ្ឋបាលកុលសម្ព័ន្ធមករដ្ឋាភិបាលសម៉យ

ប្រែសម្រួលដោយ : ពិន សំខុន (តពីលេខមុន)

•២៧ សីហា : អំពាវនាវរបស់រដ្ឋកម្ពុជាឱ្យមានការជានាគ្នាក្នុងប្រជាជាតិខ្មែរ លើកលែងតែក្រុមខ្មែរក្រហម និងមិត្តភ័ក្ត្រគេ។

•២៩ សីហា : ជំនួបត្រីភាគី សម្តេច សីហនុ. សឺង សាន និង ខៀវ សំផន នៅប៉េកាំង។

•០៨ តុលា : រដ្ឋកម្ពុជាបញ្ចេញសំណើរ៥ចំណុចដើម្បីសន្តិភាព : ១. ជួបគ្នារវាងសម្តេច សីហនុ និងតំណាងរដ្ឋកម្ពុជា។ ២. ដកទ័ពយៀកណាមឱ្យអស់ស្មើគ្នានឹងបញ្ឈប់ជំនួយដល់ទ័ពត្រីភាគីទាំងអស់។ ៣. បោះឆ្នោតសកលមួយ ដោយមានអ្នកសង្កេតការណ៍អន្តរជាតិចូលរួម ដើម្បីបង្កើតរដ្ឋាភិបាលសម្ព័ន្ធភាពមួយ ដែលអនុវត្តន៍នយោបាយជាតិអព្យាក្រិត និងមិនចូលបក្សសម្ព័ន្ធ។ ៤. ចរចាជាមួយប្រទេសថៃ ដើម្បីឱ្យមានព្រំប្រទល់ដែនសុវត្ថិភាព និងសន្តិភាព រួចហើយនាំយកជនភៀសខ្លួនចូលមកប្រទេសវិញ ដោយស្ម័គ្រចិត្ត។ ៥. រៀបចំឱ្យមានមហាសន្និបាតអន្តរជាតិ ដើម្បីធានាដល់កិច្ចព្រមព្រៀងទាំងឡាយ ដោយចុះហត្ថលេខាដោយភាគីជម្លោះខ្មែរ។ សេចក្តីថ្លែងការណ៍នោះបានធ្វើឱ្យមានការពិគ្រោះយ៉ាងមមាញឹកនៃការទូត។

•១៤ តុលា : មហាសន្និបាតនៃអ.ស.ប បានអនុម័តសំណើរបស់អាស៊ាន ដោយ ១១៧សម្លេងព្រម ២១ប្រឆាំងនឹង ១៦ អនុប្បវាទ។

•២-៤ ធ្នូ : សម្តេច សីហនុ ជួបជាមួយ ហ៊ុន សែន ជាលើកទី១ នៅហ្វែអង់តាដឺណ័រ នៅប្រទេស បារាំង។ សេចក្តីថ្លែងការណ៍៤ចំណុច បានត្រូវផ្សាយ ១. កម្ពុជាត្រូវការដោះស្រាយនយោបាយពុំមែនជាយោធាទេ។ ២. បញ្ហាខ្មែរត្រូវដោះស្រាយដោះខ្មែរខ្លួនឯង។ ៣. កិច្ចចរចាត្រូវនាំទៅរកសន្តិភាព រកការកសាងជាតិ រកការបង្កើតប្រព័ន្ធនយោបាយឯករាជ្យ ប្រជាធិបតេយ្យ អធិបតេយ្យ អព្យាក្រិត និងមិនចូលបក្សណា។ ៤. ជួបគ្នាជាថ្មីនៅខែមករា ១៩៨៨។

•១០ ធ្នូ : នៅប៉ារីស "អង្គការលើកលែងទោសអន្តរជាតិ" ទទួលស្គាល់ថា អង្គការខ្លួនបានរក្សាភាពស្ងៀមស្ងាត់ចំពោះសោកនាដកម្មនៅកម្ពុជានាចន្លោះឆ្នាំ១៩៧៥ដល់ឆ្នាំ១៩៧៩ ដោយសារបញ្ហាមនោគមវិជ្ជា ។

**ឆ្នាំ ១៩៨៨**

•១៩ មករា : ជំនួប សីហនុ. សឺង សាន។ លោក សឺងសាន ប្រកែកមិនចរចាជាមួយរដ្ឋកម្ពុជា ដរាបណាវៀតណាមមិនសរសេរជាលាយលក្ខណ៍អក្សរថានឹងដកទ័ពខ្លួនទាំងអស់ចេញពីកម្ពុជា។

•២០ មករា : លោក សឺងសាន ប្រកាសថា មានជនយៀកណាមនៅកម្ពុជាចំនួន ១.៥លាននាក់ ហើយចំនួននេះចេះតែកើនឡើងរាល់ថ្ងៃ។ រីឯខ្មែរក្រហមនិយាយថា វត្តមានវៀតណាមនៅកម្ពុជា គម្រាមកំហែងដល់ការដាច់ពូជសាសន៍ខ្មែរ។

•២០-២១ មករា : ជំនួប សីហនុ និង ហ៊ុនសែន ជាលើកទី២ នៅ សាំងហ្សែម៉ាងអង់ឡេ ជាយក្រុងប៉ារីស ។

•២៤ មករា : រដ្ឋកម្ពុជារបកាសថា អាចត្រៀមខ្លួនជួបជាមួយ ខៀវ សំផន បាន តែមិនជួប ប៉ុល ពត ឬមេខ្មែរក្រហមឯទៀតទេ ហើយរដ្ឋកម្ពុជាគ្មានគម្រោងប្រឆាំងនឹងការលើកសម្តេច សីហនុ ជាព្រះប្រមុខរដ្ឋទេ។

•២៥ មករា : ហ៊ុនសែន ប្រកាសថា ខ្លួនលោក និង សីហនុ នឹងជួបគ្នាជាបន្តទៅទៀតនៅ ព្យុងយ៉ាង នាចុងឆ្នាំ១៩៨៨ នៅប៉ារីស និង ញូវដេលី ឆ្នាំ ១៩៨៩។

•២៦ មករា : សីហនុ បានដឹងថា ព្រះអង្គចូលចិត្តគំនិតមានសម្ព័ន្ធភាពរវាងបួនបក្សគឺ ហ៊្វុនស៊ិនប៉ិច, រដ្ឋកម្ពុជា, កម្ពុជាប្រជាធិបតេយ្យ និងរណសិរ្សរំដោះជាតិ ច្រើនជាងគំនិតសម្ព័ន្ធរវាងរដ្ឋាភិបាលចម្រុះត្រីភាគីនឹងរដ្ឋកម្ពុជា។

•២៨ មករា : ជំនួប សីហនុ និង ង្វៀងគូថាច់ នៅហាណូយ ។ លោក ង្វៀងគូថាច់ គាំទ្រការផ្តួចផ្តើមនឹងបន្តចរចាគ្នា។

•៣០ មករា : នៅប៉េកាំង សីហនុ ប្រកាសលាលែងពីតំណែងជាប្រធាននៃរដ្ឋាភិបាលចម្រុះត្រីភាគី ហើយតែងតាំងព្រះរាជបុត្រ នរោត្តម រណឫទ្ធិ ឱ្យធ្វើជាប្រធាន ហ៊្វុនស៊ិនប៉ិច។ សម្តេចបានពន្យល់ថា "នេះ ដោយសារការមិនចុះសម្រុងគ្នារវាងព្រះអង្គ និង សឺងសាន" ព្រះអង្គប្រកាសលប់ចោលកម្មវិធីជួបជាមួយ ហ៊ុនសែន នៅព្យុងយ៉ាង។

•០១ កុម្ភៈ :ទំនាក់ទំនង សីហនុ និងបក្សកុម្មុយនីស្តចិន ត្រូវគេពិពណ៌នាថា "តឹងតែង"។

•០៨ កុម្ភៈ : ជំនួប សីហនុ និង ខៀវ សំផន ។

•១១ កុម្ភៈ : ប្រជុំរដ្ឋាភិបាលចម្រុះត្រីភាគីនៅប៉េកាំង ដោយគ្មានវត្តមាន សីហនុ។

•១៨ កុម្ភៈ : តាមការសិក្សារបស់សារព័ត៌មាន Far Eastern Econimic Review នៅហុងកុង និយាយថា : ការជួញដូរតាមព្រំប្រទល់ដែនខ្មែរ-ថៃ បានធ្វើរត់ពន្ធថៃចំណេញជាង១លានដុល្លារក្នុង១ខែ។ ការរត់ពន្ធនោះទាក់ទងទៅនឹងការផ្តល់អាវុធយុទ្ធសាស្ត្រចូលក្នុងដែនដីខ្មែរ។

•២០ កុម្ភៈ : សីហនុ ថ្លែងថា មធ្យោបាយតែមួយដែលអាចទប់ស្កាត់គ្រោះថ្នាក់ដោយសារតែខ្មែរក្រហម នៅក្នុងរដ្ឋាភិបាលបណ្តោះអាសន្ន គឺវត្តមានរបស់កងរក្សាសន្តិសុខអន្តរជាតិរបស់អង្គការសហប្រជាជាតិ។

•២២ កុម្ភៈ : នៅហ្សឺណែវ អង្គការសិទ្ធិមនុស្សនៃអង្គការសហប្រជាជាតិទាមទារឱ្យមានការដកទ័ពយៀកណាមចេញពីកម្ពុជា តែមិនព្រមថាត្រូវទប់ស្កាត់ ប៉ុល ពត និងមេខ្មែរក្រហម មិនឱ្យមកកាន់អំណាចទាមទារដោយ CDC ទេ។

•២៩ កុម្ភៈ : សម្តេច សីហនុ ប្រកាសត្រឡប់មកកាន់តំណែងជាប្រធានរដ្ឋាភិបាលត្រីភាគីវិញ ។

•១១ មីនា : រដ្ឋាភិបាលរដ្ឋកម្ពុជា សម្រេចបង្កើតឡើងវិញ សាកលវិទ្យាល័យភ្នំពេញ ដែលមាន១១មហាវិទ្យាល័យ ។

•១១ មេសា : រដ្ឋាភិបាលថៃបញ្ជូន "ក្រុមការងារ ៨០" ទៅជួយត្រួតពិនិត្យជំរំភៀសខ្លួន ដែលតែងតែទទួលការលួចប្លន់ ចាប់រំលោភស្ត្រី និងអំពើហិង្សានានា។

•១៨ ឧសភា : សម្តេច សីហនុ បានអំពាវនាវឱ្យប្រទេស៥៨ កុំឱ្យជួយប្រទេសវៀតណាម ដើម្បីប្រយុទ្ធប្រឆាំងការស្រេកឃ្លាន រហូតដល់មានការដកទ័ពពីកម្ពុជា។ (នៅមានតលេខក្រោយទៀត)



# ពុទ្ធប្បវត្តិអមដោយរូបភាព

# A Pictorrial Biography of Saky amuni Buddha

❖ រូបភាព និងរឿងដើមជាភាសាថៃ ដោយ គុណាប៉ាយុតា
❖ បកប្រែជាភាសាអង់គ្លេស ដោយ ហ្ស៊ីត .អេ.លី
❖ ផាត់ពណ៌ដោយ យ៉ាន់ ហ្វាលី
❖ បកប្រែជាភាសាខ្មែរដោយភិក្ខុ គង់ អាំ

១១០- ឃើញហេតុដូច្នេះ ក្មេងគង្វាលទាំងនោះ រត់សំដៅទៅហ្វូងចៀមរបស់ខ្លួនចាប់ដឹកមេចៀមមួយក្បាលត្រឡប់មកកាន់កន្លែងដែលព្រះសិទ្ធត្ថទ្រង់កំពុងដួលដេកសន្លប់ រួចវាបានជួយធ្វើឱ្យព្រះសិទ្ធត្ថទ្រង់មានព្រះកម្លាំងដឹងខ្លួនឡើងវិញ ដោយបានប្រគេនថ្វាយទឹកដោះចៀមដល់ព្រះអង្គឆាន់។ ឥឡូវនេះព្រះសិទ្ធត្ថទ្រង់មានព្រះសុខភាពល្អឡើងវិញហើយ ព្រះអង្គទ្រង់មានព្រះរាជតរិះពិចារណារកហេតុផលថា : "តើហេតុអ្វីបានជាព្រះអង្គទ្រង់ដល់នូវភាពសន្លប់ហត់ហេវ ហើយដូចម្តេចបានជាព្រះអង្គទ្រង់ដឹងខ្លួនរស់ឡើងវិញ ពេលឥឡូវនេះហេតុអ្វីក៏ព្រះអង្គទ្រង់មានព្រះសុខភាពល្អប្រសើរឡើងវិញ"។ ជាចុងបញ្ចប់ព្រះអង្គទ្រង់កំណត់បានថា បើកុំតែបានទឹកដោះពីក្មេងគង្វាលចៀមម្នាក់នោះមកឆាន់កុំអីព្រះអង្គដល់នូវសេចក្តីសម្លាប់មុននឹងបានសំរេចការត្រាស់ដឹងទៅហើយ។

១១១- ក្មេងឃ្វាលចៀមបានទទួលនូវពរសព្វសាធុការពីព្រះសិទ្ធត្ថរួចហើយក៏ត្រឡប់ទៅកាន់ហ្វូងចៀមរបស់ខ្លួនវិញ ទាំងសេចក្តីសប្បាយរីករាយឥតឧបមា ព្រោះតែបានឱកាសដ៏ល្អជួយសង្គ្រោះជីវិតអរិយបុគ្គលគួរឱ្យគោរពពន់ពេកនេះឱ្យរស់ឡើងវិញ។ ព្រះសិទ្ធត្ថទ្រង់ចាប់បន្តអង្គុយចំរើនកម្មដ្ឋាននៅក្រោមដើមឈើតទៅទៀត។ ហើយនៅពេលព្រលប់នោះ ព្រះអង្គទ្រង់បានឮសំឡេងពួកកុមារីមួយក្រុមស្រែកច្រៀងបណ្តើរដើរបណ្តើរនៅតាមផ្លូវចូលទៅកាន់រាជធានីមានទំនុកថា : "បើខ្សែធូរពេកពិណនឹងមិនឮសំឡេងពីរោះ បើរឹតឱ្យតឹងពេកនឹងត្រូវដាច់ខ្សែអស់។ មិនត្រូវឱ្យធូរពេក មិនត្រូវឱ្យតឹងពេក ពិណនឹងឮសំឡេងពិរោះអស្ចារ្យក្រៃលែង"។

១១២- ព្រះសិទ្ធត្ថទ្រង់ភ្ញាក់ព្រះទ័យយ៉ាងខ្លាំងដោយទ្រង់បានឮចំរៀងពួកស្រីក្រមុំទាំងឡាយ។ ព្រះអង្គទ្រង់បានរឹតបន្តឹងខ្សែជីវិតរបស់ព្រះអង្គឱ្យតឹងហួសពេក! ប្រសិនបើព្រះអង្គទ្រង់សោយទិវង្គត មុនពេលបានសំរេចការត្រាស់ដឹងនោះ ការព្យាយាមដ៏សែនលំបាកទាំងប៉ុន្មានដែលទ្រង់បានធ្វើកន្លងមកនឹងទៅជាគ្មានន័យអ្វីទាំងអស់។ ការធ្វើទារុណកម្មដល់រាងកាយប្រាកដមិនមែនជាផ្លូវត្រូវដើម្បីស្វែងរកបរមត្ថសច្ចៈទេ។ ដោយហេតុនោះហើយ ទើបព្រះអង្គទ្រង់សំរេចព្រះទ័យឈប់ធ្វើទុក្ករកិរិយាតទៅទៀត ហើយទ្រង់ខំបន្តប្រតិបត្តិតាមព្រះបញ្ញាព្រះអង្គ ដើម្បីស្វែងរកការត្រាស់ដឹងឱ្យដល់ទីបំផុតតែប៉ុណ្ណោះ។ ចាប់តាំងពីពេលនោះមក ព្រះសិទ្ធត្ថទ្រង់ក៏និមន្តទៅបិណ្ឌបាតជាប្រក្រតី និងទ្រង់ឆាន់ចង្ហាន់ជារៀងរាល់ព្រឹកតាមធម្មតាវិញ។

១១៣- ឥឡូវនេះព្រះសុខភាពព្រះសិទ្ធត្ថទ្រង់បានស្រួលល្អដូចដើមទាំងស្រុងវិញហើយ ចំណែកព្រះឆវីវណ្ណវិញក៏មានពន្លឺភ្លឺដូចមាស ដូចកាលដែលព្រះអង្គទ្រង់គង់នៅក្នុងព្រះរាជវាំងពីពេលមុនដែរ។ ពេលនេះទោះបីព្រះសិទ្ធត្ថទ្រង់យល់យ៉ាងច្បាស់ក្នុងព្រះទ័យថា ការប៉ងប្រាថ្នាឱ្យបានត្រាស់ដឹងតាមការធ្វើទុក្ករកិរិយាដ៏តឹងហួសហេតុនេះ មិនអាចបានសំរេច ប្រៀបដូចជាពុំនូកខ្សាច់ខ្សែលមិនអាចវិញបញ្ចូលធ្វើជាខ្សែបានយ៉ាងណាក៏ដោយក៏សមណៈទាំង៥អង្គដែលតាមបំរើព្រះអង្គយល់ឃើញផ្ទុយស្រឡះពីព្រះអង្គទៅវិញ។ សមណៈទាំងនេសះនៅតែមានជំនឿយ៉ាងច្បាស់ថា ការប្រព្រឹត្តទុក្ករកិរិយាដ៏តឹងរឹង គឺជាផ្លូវតែមួយគត់ដើម្បីឱ្យបានត្រាស់ដឹង។ ពេលដែលព្រះសិទ្ធត្ថបានលះបង់ទុក្ករកម្មនោះចោល ហើយត្រឡប់មកប្រព្រឹត្តកាន់ឆាន់ចង្ហាន់ជាធម្មតាតាមទម្លាក់វិញដូច្នេះ ក៏ស្រាប់តែពួកសមណៈទាំងឡាយនោះគិតថា ព្រះបែរមកជាអ្នកប្រាថ្នាច្រើនវិញហើយ ដោយបានឃើញ និងយល់ដូច្នោះ ពួកភិក្ខុទាំងនោះនាំគ្នារត់ចោលព្រះអង្គឆ្ពោះទៅកាន់ព្រៃមិគទាយវ័ន (បច្ចុប្បន្នហៅថា **សារនាថ**) ក្បែរក្រុងពារាណសី (បច្ចុប្បន្នហៅថា **បេនរេស**) (តទៅលេខក្រោយ)

❖ Original Illuatration and Naration in Thai by Gunapayuta.
❖ Translation into English by A Lu.
❖ Coloring by Yann Fang Lee
❖ Translation into Khmer by Bhikkhu Kong Am.

110- So he ran back to his flock, pulled out a mother goat and returned to the place where Siddhartha had fainted, and he helped Siddhartha recover consciousness by feeding him goat's milk. Now Siddhartha felt better and began to think and reason: "How did he faint and revive, why was he better now?" Finally he concluded that without the goat's milk from the shepherd boy he would have died before ever attaining enlightenment.



111- The Shepard boy received Siddhartha's blessing and returned to his flock with great joy for having had the opportunity to help revive the holy man he so revered. Siddhartha continued to sit and meditate under the tree, and at dusk he heard a group of girls singing on their way to the city: "With the strings too loose, the lute does not sound. Tighten the strings too mush, they will break apart. Not too loose, not too tight, the lute sounds so nice!"



112- Siddhartha was deeply moved by the girl's song. He had tightened his string of life too much! Should he die before attaining enlightenment, all the hardships he had gone through would be meaningless. Tormenting one's physical body was certainly not the right way to seek the ultimate truth! Thus he decided to stop practicing asceticism and only to continue his mental diligence in his search for ultimate enlightenment. From that time on, Siddhartha regularly went for alms and ate every morning.

113- Now Siddhartha's health was completely restored, and his complexion became as glowing as gold, the same complexion he had when he lived in the royal palace before. Although was quite clear now that attempting enlightenment by practicing strict asceticism was just as impossible as twining sand to make a rope, the five Sramanas who had followed him felt quite otherwise. They still firmly believed that practicing strict asceticism was the only way to enlightenment. When Siddhartha gave up asceticism and returned to normal.



(Continued After Issue)

# អាថ៌កំបាំង និងសិល្បៈនៃជីវិត
# SECRET AND ART OF LIVING



**(តមកពីលេខមុន)**

**រៀបរៀងដោយ**
**លោក ម៉ៅ ច័ន្ទសំណុំ**

● ព្រាហ្មណ៍មានមាគ៌ា ៣យ៉ាងសំរាប់មនុស្សគ្រប់រូបប្រតិបត្តិនោះគឺ (1) The path of knowledge មាគ៌ាតាមការស្វែងយល់ដោយប្រាជ្ញាតាមការគិតពិចារណា (2) The path of devotion មាគ៌ាសំដៅការរួចរំដោះដោយយកព្រះអាទិទេពជាយាន (ការបំផុសស្នេហាឥតព្រំដែនចំពោះព្រះអាទិទេព Unconditional love to God) (3) The path of karma មាគ៌ាសំដៅការរួចរំដោះដោយយកអំពើជាមូលដ្ឋាន ។ អំពើសព្វយ៉ាង គឺបំរើព្រះអាទិទេព) ។ មនុស្សយើងមានទំនោរប្លែកៗ អ្នកខ្លះស្របស្រលនឹងវិធីទី១ឬទី២ អ្នកខ្លះស៊ីនឹងវិធីចំរុះតាមការចូលចិត្ត និងនិស្ស័យរៀងៗខ្លួន។ គ្រីស្តសាសនា ឥស្លាមសាសនា និងសាសនាដទៃមួយចំនួនទៀត បានយកមាគ៌ាទី២ជាមូលដ្ឋាន ។

**(ខ) ព្រះពុទ្ធសាសនា**

ព្រះពុទ្ធបានរៀនសូត្រវិធីទាំងអស់ពីពួកព្រាហ្មណ៍ ហើយទ្រង់រកឃើញវិធីប្រតិបត្តិ៨យ៉ាងដែរ និងអាចសង្ខេបមកជា៣ជំពូកធំៗ: សីល សមាធិ និងបញ្ញា ។ វិធីសមាធិវិបស្សនាជាបច្ចេកទេសមូលដ្ឋានរបស់ព្រះពុទ្ធសាសនា ដែលខ្ញុំនឹងរៀបរាប់លំអិតក្នុងវគ្គក្រោយៗ ។

**(គ) ការរកឃើញរបស់មនុស្សសម័យយើងនេះ :**

សព្វថ្ងៃនេះ មានអ្នកប្រាជ្ញទំនើបម្នាក់ឈ្មោះលោក Eckhart Tolle បានយកវិធីប្រតិបត្តិសាសនានានាទាំងអស់មកធ្វើសំយោគបង្កើតជាវិធីប្រតិបត្តិបច្ចេកទេសសំរាប់មនុស្សទំនើបសម័យយើងនេះប្រើដោយពុំចាំបាច់ចូលកាន់សាសនាណាឡើយ ។ វិធីនោះអាចនិយាយសង្ខេបថា ការតាំងសតិនៅក្នុងពេលបច្ចុប្បន្ន (To be in the present or to be in the Now) ។ វិធីទាំងនេះកំពុងពេញនិយមក្នុងស្រទាប់សង្គមគ្រប់ជាន់ថ្នាក់ ។ បើអ្នកចង់ដឹងអំពីរឿងនេះ សូមអានសៀវភៅ The power of Now by Eckhart Tolle ។ ខ្ញុំបានដកស្រង់របៀបខ្លះៗជំរាបជូន ក្នុងវគ្គក្រោយៗទៀត ។

មានអ្នកប្រាជ្ញទំនើបថ្មីៗនិងមានរាប់បញ្ចូលទាំងពួកអ្នកវិទ្យាសាស្ត្រជាច្រើនទៀតរាប់ពុំអស់បានព្យាយាមរុករកក្នុងវិស័យកុងស្យេនិស ការត្រាស់ដឹងការរុករកធម្មជាតិពិតក្នុងខ្លួននេះ ។ សូមចូលទៅក្នុងអិនទឺណែត Youtube ពាក្យគន្លឹះ Meditation – non duality – Consciousness – self realization – Yoga – Spirituality- religion and self realization ។ល។

**សេចក្តីសន្និដ្ឋាន**

កុងស្យេនិសបរិសុទ្ធមានអត្ថិភាពនៅក្នុងបណ្តូលមនុស្សគ្រប់រូប វាឋិតនៅឆ្ងាយផុតពីពិភព កុងស្យេនិសនានា ចិត្តនិងកាយ ហើយវាជាប្រភពនៃប្រាជ្ញាការបង្កើតឆ្នៃប្រឌិត ការសប្បាយរីករាយ សន្តិភាពផ្លូវចិត្ត សុភមង្គល និងបរមសុខលើភពផែនដីនេះ ។ (The pure consciousness stays beyond human mind and body and it is the source of Intelligence, creativity, Joy, Inner peace, happiness, bliss on this planet ) ។ មនុស្សគ្រប់រូបមានកំណប់មហាសាលក្នុងខ្លួន ប៉ុន្តែជាទូទៅមនុស្សខ្លួនឯងពុំបានដឹងឡើយ ។ ជួនកាលស្លាប់ពីផែនដីនេះក៏ពុំបានដឹងអំពីអាថ៌កំបាំងនេះផង ។ ភិក្ខុឃោសនន្ទាអ្នកប្រាជ្ញពុទ្ធសាសនាខ្មែរមានសង្ឃដីការថា បើមនុស្សពុំបានជួបនឹងព្រះធម៌ក្នុងជាតិនេះទេ នោះគេនឹងត្រូវវង្វេងចាំជាច្រើនជាតិកំណើតតទៅមុខទៀត ។

**II សិល្បៈនៃជីវិត**

ចូរអ្នកពិនិត្យជុំវិញខ្លួនអ្នកទៅមើល តើមានចូលចិត្តស្រឡាញ់អ្វីខ្លះ? ឬនិយាយម្យ៉ាងទៀត តើអ្វីខ្លះដែលនាំមកនូវការពេញចិត្ត ការសប្បាយរីករាយដល់អ្នក? ចំណីឆ្ងាញ់ រូបភាពល្អ តន្ត្រីពិរោះ ផ្ទះឬភូមិគួរឱ្យចង់រស់នៅ ។ ទាំងអស់នេះសុទ្ធតែបង្កប់នូវសិល្បៈ ដូចជា ចំណីឆ្ងាញ់គឺ អាស្រ័យដោយមានគ្រឿងគ្រប់មុខ និងការប៉ិនប្រសប់របស់អ្នកដាំស្លផង ។ ភ្លេងពិរោះគឺអាស្រ័យមានឧបករណ៍ភ្លេងនិងការប៉ិនប្រសប់របស់អ្នកប្រគុំ ។ ក៏ដូចគ្នាដែរជីវិតមនុស្សយើងរស់នៅលើផែនដីនេះត្រូវការចាំបាច់មានសិល្បៈ ដើម្បីឱ្យគុណភាពនៃជីវិតស្រស់បំព្រង មានរសជាតិ ភាពសប្បាយរីករាយគ្រេបជញ្ជក់សុភមង្គលដ៏ត្រចះត្រចង់ ។ ដោយមានសិល្បៈក្នុងជីវិតនេះហើយ មនុស្សជាច្រើនបានសំរេចជោគជ័យគ្រប់វិស័យ ការសិក្សាសន្សំវិជ្ជាក្នុងលោក ការប្រកបការងារចិញ្ចឹមជីវិត ការស្វែងរកទ្រព្យសម្បត្តិ កិត្តិយស បុណ្យស័ក្តិក្នុងសង្គម ។ ការសំរេចជោគជ័យក្នុងវិស័យដូចរៀបរាប់មកនេះគឺជាផ្នែកលោកខាងក្រៅខ្លួនប៉ុណ្ណោះ គឺបានតែមួយចំហៀងនៃទិដ្ឋភាពជីវិតប៉ុណ្ណោះ ។ នៅមួយចំហៀងទៀត មនុស្សយើងភាគច្រើនលើសលុបពុំទាន់បានប្រើប្រាស់កប់បាត់ក្នុងខ្លួនរហូតដល់ស្លាប់ទៅវិញក៏ពុំដឹង ពុំស្គាល់ ពុំយល់ផង ។ ធម្មជាតិបានផ្តល់នំមួយដុំមកឱ្យមនុស្សគ្រប់រូបបានហូបឆ្ងាញ់ពិសារ ។ ប៉ុន្តែយើងហូបបានតែពាក់កណ្តាល គួរឱ្យស្តាយណាស់ពាក់កណ្តាលទៀតគឺបានដល់សុភមង្គលដែលចេញពីពិភពខាងក្នុងខ្លួនមនុស្សយើងម្នាក់ៗមក ។ យើងម្នាក់ៗបានប្រើងាមពល១០០ភាគរយទៅលើការស្រាវជ្រាវពិភពខាងក្រៅខ្លួនទុកឱ្យជីវិតខាងក្នុងខ្លួនមានដំណើរការតាមយថាកម្ម គ្មានរបៀបរៀបរយ គ្មានសិល្បៈ ពុំមានការកែឆ្នៃប្រៀបដូចជាត្បូងដែលឋិតនៅក្នុងផ្ទាំងថ្មពុំទាន់ឆ្នៃ ។ ដូចខ្ញុំបានរៀបរាប់លំអិតក្នុងវគ្គកុងស្យេនិសពេលដឹងខ្លួន និងកុងស្យេនិសពេលយល់សប្តិ ស្រាប់ថាតើមនុស្សយើងម្នាក់ៗទទួលរងគ្រោះពីប្រអប់មេម៉ូរីរាប់រយពាន់ម៉ឺនសែនលានផង ។ ខ្ញុំបានបញ្ជាក់ថា មនុស្សមានលទ្ធភាពរស់នៅក្នុងបន្ទប់មេម៉ូរីផង និងក្រៅមេម៉ូរីផង ។ ប៉ុន្តែយើងជាប់ផុងនៅតែមួយចំហៀង ពោលគឺរស់នៅតែក្នុងមេម៉ូរីខ្លួន ហើយត្រូវវាគៀបសង្កត់បញ្ជាផ្តាច់មុខពីក្នុងមក ។ ដើម្បីឱ្យមនុស្សប្រែជាមនុស្សពេញលេញ គេត្រូវការរស់ប្រកបដោយសិល្បៈនៃជីវិត ពោលគឺគេត្រូវផ្សំ ធ្វើយ៉ាងណាឱ្យលទ្ធភាពទាំងពីរនេះ វត្តមានស៊ីសង្វាក់គ្នា (Harmony) បង្កើតបានជាជីវិត មានរសជាតិ និងមានន័យ ។ **(តទៅលេខក្រោយ)**

(Continued from page 12 )

## Buddhist Monk Accused...

the monks who being looked up to as someone with respectable knowledge in carrying out religious ethics and abide by the Buddhist teaching of precepts at all times. Part of the precepts is a Buddhist monks are not to have any direct eyes contact or physical contacts with female of all age.Peggy O'Hare, staff writer for Houston Chronicle Newspaper reported on January 20 that an accused monk




Por Venh, 41 of Wat Angkorchum in Spring Texas "wanted on two charges of sexual assault of a child." The accused monk said to having sex with a 16 -year-old girl at his temple from June until September. In an interview with ABC 13 Eyewitness News of Houston, assistant district attorney Lauren Bard reported, "One of the reasons this came to light was that she found out that he may be having sexual relations with someone else. She got upset and started to talk to people." The girl first confessed to a youth services specialist at her high school. Per O'Hare, court paper indicated that the girl told investigators in December of last year she often accompanied her mother to the temple where her mother deliver food to the monk as her mother is a cook and clean for the temple. Court record also stated, "The monk takes her into his bedroom where they have sex." The girl also admitted to being in love with the 41-year-old monk and was hurt when she later learned he was "possibly sexually active" with another woman who also involved with the temple. The 16-year-old girl was reported to contemplating suicidal thoughts with plans to "hanging herself or overdosing on pills."According to O'Hare, Por Venh's attorney, Cristobal Galindo reported to the Harris County Sheriff's investigators on January 4 that his client Por Venh had fled the U.S. and returned to Cambodia. Bard stated in her interviewed with the Eyewitness News, "At this point, there's a warrant that has been issued for his arrest. We're going to continue to do our job and investigate the case, talk to her do what we can to see if anybody else has been victimized. We're going to do our job and investigate the case. And should he ever show back up, we'll follow through." Por Venh has been ordered "held on bonds totaling $40,000" on two charges for "sexual assault of a child under 17 years old." Por Venh showed no previous criminal history in Harris County.

# ជោគជតារាសីលោកអ្នកថ្ងៃទី២៨ មករា - ១០ កុម្ភៈ ២០១១

**ឆ្នាំជូត : (ពង្សទេវតាប្រុស ធាតុទឹក)**

រាសីលោកអ្នកល្អជាមធ្យម។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ គឺអាចទទួលបានផលសម្រេចត្រឹមតែពាក់កណ្តាលប៉ុណ្ណោះ ដូច្នេះលោកអ្នកមិនត្រូវហ៊ានប្រថុយប្រថានបណ្តាក់ទុនរកស៊ីដោយទ្រង់ទ្រាយធំឡើយ ។ ចំពោះគូស្នេហ៍មានភាពស្និទ្ធស្នាលដូចសព្វមួយដង ៕

**ឆ្នាំឆ្លូវ : ( ពង្សមនុស្សប្រុស ធាតុដី )**

រាសីលោកអ្នកល្អជាមធ្យម។ រាល់កិច្ចការងាររកស៊ីជួញដូរកាក់កបល្អគ្រាន់បើ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ ចូរកុំធ្វេសប្រហែសឲ្យសោះ ជាពិសេសចំពោះអាជីវករអ្នករកស៊ីលក់ដូរមុននឹងប្រគល់ ឬទទួលនូវមុខទំនិញសព្វសាររពើ ចូរចេះពិនិត្យមើលគុណភាព និងរាប់ចំនួនឲ្យបានត្រឹមត្រូវ។ ចំពោះគូស្វាមីភរិយា ចូរប្រយ័ត្នអ្នកក្រោមកញ្ចុះញង់ ៕

**ឆ្នាំខាល : ( ពង្សយក្សស្រី ធាតុឈើ )**

រាសីលោកអ្នកល្អមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ។ ក្នុងរយៈពេលនេះថ្វីត្បិតតែការងាររកស៊ីអាចរើប ៗបន្តិចឡើងវិញក្តី តែអ្វីដែលលោកអ្នកគួរប្រយ័ត្នប្រយែងនោះ គឺនឹងមានមនុស្សសម្តីផ្អែមបង់បោកប្រាស់តាមគ្រប់រូបភាព ដូច្នេះទាំងបុរសស្ត្រី គឺមិនត្រូវចាប់ត្របៀកទន់ជឿទុកចិត្តគេពេកទេ។ គូស្នេហ៍ក្នុងរយៈពេលនេះប្រកបតែសេចក្តីសុខនឹងគ្នា ៕

**ឆ្នាំថោះ : ( ពង្សមនុស្សស្រី ធាតុឈើ )**

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខដោយសន្សឹម ៗ។ ក្នុងរយៈពេលនេះដោយទំនាយទាយថា អាចបង់ខាតទ្រព្យខ្លះៗនោះ ដូច្នេះចូរកុំឲ្យគេខ្ចីរបស់របរមានតម្លៃឲ្យសោះ ព្រោះកាលបើបានធ្លាក់ដល់ដៃគេហើយ គឺគ្មានថ្ងៃបានវិលត្រឡប់វិញឡើយ ។ ចំពោះគូស្វាមីភរិយាក្នុងរយៈពេលនេះមានផលប៉ះទង្គិចគ្នាបន្តិចបន្តួច ៕

**ឆ្នាំរោង : (ពង្សទេវតាប្រុស ធាតុមាស)**

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបរឿងរកាំរកូសច្រើន ។ ក្នុងរយៈពេលនេះ បើមានរឿងឈ្លោះទំរកើតឡើង ចូរចេះអត់ធ្មត់ និងរម្ងាប់ចិត្តឲ្យបានត្រជាក់។ ចំពោះស្ត្រីភេទក្នុងរយៈពេលនេះមិនត្រូវនិយាយស្តីបំប៉ាច់បំប៉ោចឥតបានការច្រើនពេកទេ ព្រោះរឿងរ៉ាវផ្សេងៗអាចកើតចេញពីពាក្យសម្តី ។ ចំពោះគូស្វាមីភរិយាចូរប្រយ័ត្នប្រយែងក្រែងមានអ្នកទីបីចូលជ្រៀតជ្រែក ៕

**ឆ្នាំម្សាញ់ : (ពង្សមនុស្សប្រុស ធាតុភ្លើង)**

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងរឿងរកាំរកូសច្រើន។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ ចូររៀបចំគម្រោងផែនការជាមុនទើបពុំមានការថ្លោះធ្លោយ។ ក្រៅពីនោះបើមានរឿងឈ្លោះទំរកើតឡើង ចូរចេះអត់ធ្មត់ និងរម្ងាប់ចិត្តឲ្យបានត្រជាក់ទើបរឿងតូចមិនអាចក្លាយជារឿងធំបាន។ គូស្នេហ៍ក្នុងរយៈពេលនេះច្រើនពាក់មុខយក្សដាក់គ្នា៕

**ឆ្នាំមមី : (ពង្សទេវតាស្រី ធាតុភ្លើង)**

រាសីលោកអ្នកឡើងខ្ពស់ត្រដែត។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់។ ក្នុងរយៈពេលនេះទោះជាលោកអ្នកបានប្រកបកិច្ចការងារអ្វីក៏ដោយ គឺរមែងតែងតែបានទទួលផលសម្រេចសមតាមបំណងប្រាថ្នាទាំងអស់។ ក្នុងរយៈពេលនេះបុរសត្រូវប្រយ័ត្នចំពោះមនុស្សស្រីដែលមានសម្តីផ្អែមអាចលោយទ្រព្យធាប់។ គូស្នេហ៍ប្រកបតែសេចក្តីសុខក្សេមក្សាន្ត ៕

**ឆ្នាំមមែ : (ពង្សទេវតាស្រី ធាតុមាស)**

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះអ្វីៗច្រើនមានការប្រែប្រួលពុំទៀងទាត់ឡើយ។ ដូច្នេះបើលោកអ្នកមានទិញលក់ដីធ្លីផ្ទះ ឬវត្ថុមានតម្លៃផ្សេងៗ ចូរធ្វើលិខិតស្នាមដោយមានចុះហត្ថលេខា ឬផ្តិតស្នាមមេដៃឲ្យបានត្រឹមត្រូវទើបទៅថ្ងៃមុខពុំមានបញ្ហាចោទឡើង ។ គូស្នេហ៍ប្រកបតែសេចក្តីសុខក្សេមក្សាន្ត ៕

**ឆ្នាំវក : (ពង្សយក្សប្រុស ធាតុដែក)**

រាសីលោកអ្នកល្អជាមធ្យម។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ ថ្វីត្បិតតែមានភោគផលចំណូលហូរចូលច្រើនគួរសមក្តី តែពុំមានសល់អ្វីជាដុំកំភួនឡើយ ព្រោះចាយវាយខ្ជះខ្ជាយខ្លាំងពេក ហើយក៏មិនខុសពីទូកធំក្តោងធំនោះដែរ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះទាល់តែចេះអត់ឱនឲ្យគ្នាទៅវិញទៅមកទើបមិនអាចប្រេះឆាគ្នាបាន ៕

**ឆ្នាំរកា : (ពង្សយក្សប្រុស ធាតុដែក)**

រាសីលោកអ្នកល្អជាមធ្យម។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះអ្វីៗច្រើនមានការប្រែប្រួលពុំទៀងទាត់ឡើយ ដូច្នេះបើលោកអ្នកមានលក់ដីធ្លីផ្ទះសម្បែង ឬវត្ថុមានតម្លៃផ្សេងៗ ចូរធ្វើលិខិតស្នាមជាលាយល័ក្ខណ៍អក្សរដោយមានចុះហត្ថលេខា ឬផ្តិតស្នាមមេដៃឲ្យបានត្រឹមត្រូវទើបទៅថ្ងៃមុខពុំមានបញ្ហាចោទឡើង ។ ចំពោះគូស្នេហ៍មានភាពស្និទ្ធស្នាលដូចប្រក្រតី៕

**ឆ្នាំច : ( ពង្សយក្សស្រី ធាតុដី )**

រាសីលោកអ្នកឡើងខ្ពស់ត្រដែត។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អណាស់។ ក្នុងរយៈពេលនេះលោកអ្នកមានអារម្មណ៍ភ្លឺថ្លាគំនិតប្រាជ្ញាឈ្លាសវៃ ទោះបានប្រកបកិច្ចការងារអ្វីៗក៏ដោយក៏អាចទទួលបានផលសម្រេចសមតាមបំណងប្រាថ្នាទាំងអស់ តែចូរកុំមានចិត្តលោភលន់ឲ្យសោះ ព្រោះការលោភលន់នាំមកនូវក្តីវិនាសអន្តរាយ។ គូស្នេហ៍មានភាពល្អកល្អិនយល់ចិត្តគ្នាល្អណាស់៕

**ឆ្នាំកុរ : (ពង្សមនុស្សស្រី ធាតុទឹក)**

រាសីលោកអ្នកឡើងខ្ពស់ត្រដែត។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់។ ក្នុងរយៈពេលនេះ ថ្វីត្បិតតែការងាររកស៊ីរបស់លោកអ្នកបានជួបនឹងគូប្រជែងដើងខ្លាំងយ៉ាងណាក្តីក៏មិនភ័យព្រួយអ្វីដែរ ព្រោះលោកអ្នកមានប្រៀបឈ្នះជាប់ជានិច្ច។ ចំពោះកំលោះក្រមុំក្នុងរយៈពេលនេះអាចទាក់ទងគ្នានឹងបានក្លាយជាគូស្នេហ៍ដ៏ប្រពៃមួយគូ ៕





## កក់សក់បែបណា ទើបត្រឹមត្រូវតាមវិធី?

●ដើម្បីថែបំប៉នសរសៃសក់ឲ្យទន់រលោងស្រស់ស្អាតសុភាពស្ត្រីនិយមប្រើប្រាស់វិធីអប់សក់យ៉ាងហោចណាស់ក៏ក្នុង១សប្តាហ៍ម្តងដែរ ។ ក៏ប៉ុន្តែបញ្ហាដែលត្រូវដោះស្រាយនៅចំពោះមុខនោះ គឺមានតម្លៃខ្ពស់ដែលកត្តានេះប្រសិនបើជាស្ត្រីវ័យមានការងារធ្វើមិនថ្វីនោះទេ តែសុភាពស្ត្រីដែលគ្មានការងារនៅឡើយនោះពិតជាជួបនឹងបញ្ហាមិនខាន ។ តែមិនថ្វីទេព្រោះពេលនេះយើងមានរូបមន្តអប់សក់តាមបែបធម្មជាតិចំណាយប្រាក់អស់តិចទទួលបានលទ្ធផលគួរឲ្យពេញចិត្តដូចខាងក្រោម ÷

ណែនាំឲ្យអ្នកប្រើប្រាស់ចេកអំបូងកិនលាយជាមួយទឹកឃ្មុំ រួចច្រើវាបិទបំពោកនៅលើសក់ក្បាលទុកចោលរយៈពេល២០នាទីទើបលាងចេញ ។ វិធីនេះវាជួយធ្វើឲ្យសរសៃសក់ដែលមានសភាពស្ងួតក្រៀមទៅហើយនោះ មានសំណើម និងរលើបរលោងឡើងមកវិញយ៉ាងឆាប់បំផុត ។ ប្រសិនបើមានឱកាសទំនេរផ្ទៀតធ្វើត្រឹមតែមួយសប្តាហ៍ម្តងធានាថា សរសៃសក់មានសភាពស្រស់ស្អាតគួរឲ្យពេញចិត្តបានដែរ៕

●ជឿជាក់ថា នៅមានមនុស្សច្រើននាក់ណាស់ដែលមិនទាន់យល់ច្បាស់ថា ការកក់សក់ដែលត្រឹមត្រូវនោះ គួរធ្វើបែបណា ? ជំហានដំបូង គឺចាប់ផ្តើមរំលាយសាប៊ូរាវជាមុនសិន ព្រោះសាប៊ូភាគច្រើនមានសភាពខាប់ ។ ក្រោយពេលរំលាយសាប៊ូឲ្យរាវហើយ គឺជួយដល់ការកក់សក់ ឬលាងជម្រះសរសៃសក់ ។

សម្រាប់អ្នកដែលមិនទាន់ស្ទាត់ជំនាញក្នុងការកក់សក់នៅឡើយនោះ យើងណែនាំឲ្យប្រើដបសាប៊ូទទេមួយរួចចាក់សាប៊ូដែលត្រូវកក់ពាក់កណ្តាលបន្ទាប់មកថែមទឹកចូលឲ្យពេញ ហើយសាប៊ូដែលនៅសល់ពាក់កណ្តាលទៀត អាចធ្វើវិធីរំលាយដូចគ្នានោះអ្នកនឹងទទួលបានសាប៊ូ២ដប ។ ប្រសិនបើមានសំបកដបប្រភេទមានក្បាលសង្កត់កាន់តែប្រសើរ ព្រោះជួយឲ្យយើងគ្រប់គ្រងបរិមាណប្រើប្រាស់មិនខ្ជះខ្ជាយ ។

ចាក់សាប៊ូទៅលើបាតដៃ រួចហើយញីនៅលើសក់ក្បាលដោយប្រើដៃទាំងពីរខណៈពេលសក់សើម ។ ប្រសិនបើយើងចាក់សាប៊ូទៅលើសរសៃសក់ ដោយត្រង់ៗនោះ អាចប្រើបរិមាណហួសពីតម្រូវការ ។ មួយវិញទៀត សាច់សាប៊ូអាចនៅកកផ្តុំតែមួយកន្លែងមិនជ្រាបពេញផ្ទៃសក់ដែលជាមូលហេតុមិនអាចលាងជម្រះសរសៃសក់ឲ្យបានស្អាតនោះឯង ។ អ្នកគោរពចងចាំទុកថា ត្រូវប្រើប្រាស់សាប៊ូឲ្យមានប្រយោជន៍គ្រប់តំណក់ក្រោយពេលជិតអស់ទឹកសាប៊ូពីក្នុងដប ហើយអ្នកអាចបន្ថែមទឹកបន្តិចទៀតប្រើកក់បន្តទទួលបានគុណភាពដូចគ្នា ។

អ្នកអាចកក់សក់ញឹកញាប់បានទៅតាមតម្រូវការដោយប្រើសាប៊ូល្អឺឲ្យបែកពពុះតែមួយលើកក៏គ្រប់គ្រាន់ដែរ ។ សម្រាប់អ្នកកក់សក់ស្ទើររាល់ថ្ងៃអ្នកមានសក់វែងគ្រាន់តែល្អីត្រឹមតែលើក្បាលឲ្យ

## អប់សក់តាមបែបធម្មជាតិ

បែកពពុះ គឺជាការស្រេច ។ ក៏ប៉ុន្តែចំណុចនេះគោងមើលពីសភាពកខ្វក់របស់សរសៃសក់ផងដែរ ប្រសិនបើទើបនឹងប្រឈមជាមួយបរិស្ថានមិនសូវល្អនោះទាមទារឲ្យកក់រហូតសព្វសរសៃសក់ជាងពេលមុនៗ។

នៅក្នុងរដូវក្តៅគួរកក់សក់ឲ្យញឹកញាប់ និងអ្នកដែលស្ថិតនៅក្នុងតំបន់ឧស្សាហកម្ម មានបរិស្ថានមិនសូវល្អ ឬឆ្លងកាត់ពិធីជប់លៀងដែលពោរពេញទៅដោយផ្សែងបារីក៏ប្រឈមនឹងការខូចគុណភាពសក់បានដូចគ្នា ។ ក្រៅពីនោះអ្នកមានសក់លាបថ្នាំសក់ព្រៃក៏មានតម្រុយថា បីតយកវត្ថុស្មោកគ្រោកបានដោយងាយទៀតផង ។

បើតាមការស្រាវជ្រាវអ្នកធាប់ក្រៀមឬធាប់ខូចគួរប្រើសាប៊ូប្រភេទមានកម្រិត PH ទាបជាការល្អ៕



# Grand Opening ចាប់បើកហើយ !

Philadelphia Beauty Cosmetology
Teaches:
• Cosmetology • Facial • Nail • Teacher

**តម្លៃពិសេស**

- កាត់សក់ប្រុស **$5** / កាត់សក់ស្រី **$7**/ អ៊ុតសក់ / លាបពណ៌សក់ / ហាយឡាយពណ៌សក់ / ធ្វើម៉ូដសក់គ្រប់មុខ
- កាត់ និងលាបក្រចកដៃ **$18** / ហ្វូលសិតអ៊ូរីឡេ - ចែល និងផ្សេងៗគ្រប់មុខ
- ម៉ាស្សាថែស្បែកមុខ **$15** / (សំអាតមុខ) តែងលាបមុខ / ដកចិញ្ចើម **$4** / Waxing / រើកផ្សេងៗ ដោយតម្លៃ ធូថ្លៃ

Enroll Now for
**50 % off**
Tuition

**គ្រូបង្ហាត់មានបទពិសោធន៍ និយាយភាសាខ្មែរ អង់គ្លេស វៀតណាម ចិន និងស្ប៉ាញ៉ុល**

Day & Evening ClassesMonday – Saturday.
Day Classes 8 a.m. – 5 p.m/ Night Classes 5 p.m. – 9:30 p.m.

711 SNYDER AVENUE PHILADELPHIA., PA 19148
TEL. 215-465-1614 or 215-609-7815, Fax: 215-465-1699




**PHILADELPHIA COSMETOLOGY**




សាលាសិក្សាពិការបង្រៀនកាត់សក់ ធ្វើក្រចក ថែរក្សាស្បែក លំអរសម្ផស្ស ដាក់រោមភ្នែក ដកចិញ្ចើម -WAXING បង្រៀនធ្វើគ្រូ



One of the Biggest Cosmetology School in Philly

Professional Instructors
with Many Years of Experienced.
Teaches in English, Vietnamese, Cambodian,
Chinese, and Spanish Languages.




# Khmer Post Classified

**To Place an ad, call (267) 253-3947**
**e-mail KhmerPostUSA@gmail.com**

# ខេនី គ្រូវេទមន្តដោយសម្មាធិ

មើលជម្ងឺនានា, ដោះមន្តស្នេហ៍, រំដោះគ្រោះ, ជួយគ្រួសារបែកបាក់,
មើលមុខរបររកស៊ី, ហុងស៊ុយ, ធ្វើយ័ន្តការពារខ្លួន ។
ចេះមន្តអាគមតាមរបៀប ចិន, យួន, ចាម ។
បើចង់ដឹងបន្ថែមសូមទំនាក់ទំនងតាមរយៈទូរស័ព្ទ:
(540) 397-2603 ខ្ញុំឈ្មោះ "KENNY"

# ធីណា TINA អ្នកទាយជោគជតា និង អ្នកណែនាំ



**TINA PSYCHIC READER & ADVISOR**

Invites you to have a Clairvoyant experience where she offers tarot card readings, palmstry, companion reading or simply find out your spiritual color of life.
I have successfully guided people through their confusing circles of life, such as love, business or simply to find peace within their selves.

**Specializing In:**
• Clairvoyant & Crystal Readings • Tarot Cards
• Palmistry • Meditation Therapy • Aura Cleansing
• Soulmate Consultations

**267-444-3924**
Part of Center City
711 Walnut St. Phila., PA

**Mention this ad for a $5 OFF Special**

# Yoo's Auto Service and Collision

## យូ បំរើសេវារថយន្ត

នឹងរថយន្តគ្រោះថ្នាក់ប៉ះទង្គិច

**FREE ESTIMATES**

យើងនឹងជួសជុលរថយន្តដ៏មានតម្លៃរបស់លោកអ្នក ឱ្យបានប្រសើរបំផុត តាមតែយើងធ្វើបាន ដើម្បីសុវត្ថិភាពលោកអ្នក មិនឱ្យខុសចិត្តឡើយ ។




189 W. Duncannon Ave. Phila., PA 19120

COUPON
$10 OFF TOWARD EMISSION AND STATE INSPECTION
Khmer Post

**ផ្នែកជាងម៉ាស៊ីន**

Check Engine Light Diagnostic
Electronic Wheel Alignment
Certified Enhanced Emission
Inspection & Repairs
Muffler & More

**ផ្នែកជួសជុលតួរថយន្ត**

Expert Body Work
Fender & Paint Work
Frame Straightening
Insurance Specialists

**ទូរស័ព្ទរក SAM 215-457-7777 ឬ 215-457-7779, Fax-215-457-7475**

តមកទំព័រទី ០១

# ទិវាម៉ាតាំង លូធើរឃីង....




បងារជាច្រើនកាន់ដោយភាគច្រើនជាជនអាស៊ី ជាពិសេសមានខ្មែរជាច្រើន បានចូលរួមផងដែរ ដែលបានថ្លែងរំលឹកអំពីសេរីភាពរបស់មនុស្សភាពស្មើគ្នាក្នុងសង្គម ដែលបណ្ឌិតឃីងបានខិតខំតស៊ូមុនពេលគាត់ត្រូវបានគេលបបាញ់សម្លាប់នោះ មកទល់ពេលនេះ បានបន្តដំណើររហូតមកដល់បានជនស្បែកខ្មៅទី១ឡើងកាន់ឋានៈខ្ពង់ខ្ពស់បំផុតនៅសហរដ្ឋអាមេរិក ដែលដំណើរនេះមិនទាន់បានចប់សព្វគ្រប់នៅឡើយទេ។ សហគមន៍បានស្រែកអំពាវនាវឱ្យប្តូរច្បាប់អន្តោប្រវេសន៍ ដែលបណ្តេញកូនខ្មែរឱ្យត្រឡប់ទៅកម្ពុជាវិញយ៉ាងអយុត្តិធម៌ នៅពេលធ្លាប់មានទោសឧក្រិដ្ឋ បើទោះជាសាងខ្លួនបានទៅជាពលរដ្ឋគំរូទៅ ហើយក្តីក៏ច្បាប់អន្តោប្រវេសន៍ដ៏កំណាចនោះនៅតែបញ្ជូនទៅប្រទេសដើមដដែល។

នៅពេលនេះ សមាជិកគ្រួសារខ្មែរ ដែលខ្លះត្រូវបានគេចាប់ឪពុកទៅមន្ទីរឃុំឃាំងរង់ចាំនិរទេស បានស្រែកដង្ហោយកុំឱ្យច្បាប់អន្តោប្រវេសន៍អាមេរិកាំង មកបំបែកបំបាក់ក្រុមគ្រួសារស្លូតត្រង់មានកូនក្មេងខ្ចី ហើយឪពុកជាជន្ទល់គ្រួសារតែមួយគត់។ ស្ថានភាពរបៀបនេះ បាតុករដែលចូលរួមដោយមនុស្សគ្រប់វ័យ ជាមន្ត្រី ជាអ្នកនយោបាយ ជាយុវជន ជានិស្សិត បានចេញមកសម្តែងមតិនៅមុខក្រសួងអន្តោប្រវេសន៍យ៉ាងច្រើនកុះករ តែអ្នកកាសែត វិទ្យុ ទូរទស្សន៍បានបង្ហាញខ្លួនចំនួនតិចតួច៕

*(សូមអានអត្ថបទជាភាសាអង់គ្លេសនៅទំព័រទី១២)*









# ស្ត្រីខ្មែរដំបូងបង្អស់ដែលបានធ្វើដំណើរពីប្រទេសបារាំងមកភ្នំពេញតាមផ្លូវគោក



(តពីលេខមុន)

ដោយ : ពិន នារីពិទូ

●●● អ្នកធ្វើដំណើរផ្សងព្រេងទាំងពីរបានឆ្លងកាត់ព្រំប្រទល់ដែនចិនឈានចូលទឹកដីវៀតណាមដោយសុវត្ថិភាព ពួកគេបានចំណាយពេលអស់ជាងបីម៉ោងនៅក្នុងអាគារជនអន្តោប្រវេសន៍ និងគយ ប៉ុន្តែត្រូវខកបំណងដោយសារអាជ្ញាធរវៀតណាមមិនអនុញ្ញាតឱ្យនាំរថយន្តផ្ទាល់ខ្លួនរបស់ពួកគេធ្វើចរាចរណ៍ឆ្លងកាត់ប្រទេសនេះបាន ពេលនេះយានយន្តត្រូវបានចតទុកនៅតាមព្រំដែនបណ្តោះអាសន្ន។ ពួកគេបានសំរេចចិត្តធ្វើដំណើរតាមឡានក្រុង ទៅទីក្រុងហាណូយ ដើម្បីធ្វើការទំនាក់ទំនង



ទៅស្ថានទូតបារាំង។ ដោយកិច្ចការមិនទាន់បានសំរេច ពួកគេបានទាក់ទងបន្តទៅក្រសួងគមនាគមន៍ និងដឹកជញ្ជូន ដើម្បីធ្វើការចុះបញ្ជីយានយន្តព្រមទាំងការិយាល័យអាជ្ញាធរកាំកុងត្រូល និងភ្នាក់ងារទេសចរណ៍វៀតណាមមួយចំនួនទៀត អ្នកធ្វើដំណើរផ្សងព្រេងទាំងពីរបានស្វះស្វែងយ៉ាងលំបាកក្នុងការប្រាស្រ័យទាក់ទងជាមួយនឹងអជ្ញាធរវៀតណាម ដើម្បីទទួលបានសិទ្ធិក្នុងការឆ្លងកាត់ប្រទេសជាមួយរថយន្តផ្ទាល់ខ្លួនដោយស្របច្បាប់។

ពួកគេបានស្នាក់នៅក្នុងខេត្ត HaLongBai ដើម្បីរង់ចាំលិខិតឆ្លើយតបពីស្ថាប័នគយក្នុងការរង់ចាំនេះ ពួកគេមានឱកាសដើរកំសាន្តក្នុងតំបន់ឆ្នេរកោះ និងជិះទូកទៅទស្សនាកោះ Cat Ba ដែលមានអ្នកទេសចរណ៍ជាច្រើននិយមមកទស្សនាកោះនេះ ដែលមានអាកាសធាតុអំណោយផលរួមទាំងមានចុះអ័ព្ទខ្លះផង និងបានបន្តទៅទស្សនាគុហា Hang Sung So នៅទីនេះបានបង្ហាញនូវទិដ្ឋិភាពដ៏ស្រស់ឆើតឆាយនៃឆ្នេរកោះ Cat Ba ទូកនេសាទត្រីតូចៗនៅលើកោះ បាននាំអារម្មណ៍ឱ្យអ្នកទេសចរណ៍ភ្លេចអស់នូវភាពលំបាកដែលកើតឡើងក្នុងពេលថ្មីៗនេះការជិះទូកត្រូវបានបញ្ចប់នៅលើឆ្នេរកោះភ្នាក់ងារទេសចរណ៍បាននាំពួកគេឱ្យត្រឡប់ទៅសណ្ឋាគារនៅតាមមាត់ឆ្នេរតាមការណាត់។ កោះ Cat Ba ជាកោះដ៏ធំជាងគេនៅក្នុងខេត្ត Ha Long Bai តាមរយៈសណ្ឋាគារនៅមាត់សមុទ្រនេះអាចមើលឃើញទិដ្ឋភាពជាទីមនោរម្យ និងជា

កន្លែងលំហែរកាយនាថ្ងៃឈប់សំរាកដ៏ល្អឥតខ្ចោះ។ អ្នកធ្វើដំណើរផ្សងព្រេងទាំងពីរបានបន្តដំណើរកំសាន្តក្នុងសួនច្បារជាតិ ដែលគ្របដណ្តប់លើផ្ទៃដីកោះអស់ពាក់កណ្តាលដែលជាជំរករបស់សត្វព្រៃគ្រប់ប្រភេទ និងជាឱកាសល្អក្នុងការគយគន់ព្រះអាទិត្យជិតអស្តង្គតនាពេលសាយ័ន្ត។

ពួកគេបានជិះឡានក្រុងត្រឡប់មកទីក្រុងហាណូយវិញដើម្បីជួបជាមួយនឹងនាយកចាត់ការទូទៅផ្នែកគយម្តងទៀត និងធ្វើការសាកសួរព័ត៌មានក្នុងការជួយសង្គ្រោះរថយន្តរបស់ពួកគេ ដែលត្រូវឃាត់ទុកនៅតាមព្រំដែន ប៉ុន្តែចម្លើយដែលទទួលបានគឺការបដិសេធន៍ដោយថាហួសពីកតព្វកិច្ចដែលត្រូវដោះស្រាយលើ



បញ្ហា នេះដែលជាហេតុធ្វើឱ្យអ្នកទាំងពីរមានការខកចិត្តយ៉ាងខ្លាំង។ ពួកគេបានមកដល់ព្រំប្រទល់ Lang Son នាពេលរសៀលនេះដោយគ្មានលិខិតស្នាមនៅ




ផែនទីដំណើរប្រមាណ២ម៉ឺនគីឡូម៉ែត្រ ពីបារីសមកភ្នំពេញ តាមរថយន្តដោយ អូរីលីវ និងស៊ីវយ៉ា

ទីនោះជនជាតិវៀតណាមមានការស្វាគមន៍រាក់ទាក់យ៉ាងខ្លាំង និងបានអញ្ជើញពួកគេឱ្យញុំាអាហាររួមគ្នាជាមួយផងដែរ។ នាពេលរសៀលបានជួបជាមួយនឹងភ្នាក់ងារគយ ការទន្ទឹងរង់ចាំពួកគយអស់ជាច្រើនម៉ោងទើបខាងភ្នាក់ងារគយឱ្យចម្លើយថា ពួកគេមានផ្លូវសំរាប់ជ្រើសរើសពីរ គឺត្រឡប់ទៅប្រទេសចិនវិញ



រឺក៏ទាក់ទងទៅស្ថានទូតបារាំងដើម្បីរកដំណោះស្រាយ។ ការស្នាក់ស្នាញនៅចំពោះមុខនៅតែបន្តពួកគេមិនអាចជ្រើសរើសយកជំរើសណាមួយបានទេ គ្មានមធ្យោបាយចំណែកឯឯកសារឆ្លងកាត់ទៅប្រទេសចិនបានអស់សុពលភាពទៅហើយ ហេតុនេះមិនអាចធ្វើដំណើរត្រឡប់ក្រោយវិញបាន ក្នុងការធ្វើលិខិតស្នាមឡើងវិញត្រូវចំណាយអស់៥០០០យូរ៉ូឯណោះ ចំណែកឯរថយន្តរបស់ពួកគេត្រូវបានឃាត់ទុកនៅកន្លែងគយដដែល។ នៅក្នុងទីក្រុងហាណូយ ចំណាយត្រឹមតែ២៥ដុល្លារប៉ុណ្ណោះដើម្បីទទួលបានទិដ្ឋាការសំរាប់ស្នាក់នៅប្រទេសកម្ពុជាយើង។ ពួកគេទាំងពីរខិតខំស្វះស្វែងយ៉ាងខ្លាំងក្នុងការស្វែងរកជំនួយដើម្បីរំដោះយានយន្តដែលត្រូវបានហាមឃាត់ដោយអាជ្ញាធរវៀតណាម នៅតាមព្រំដែន។ ពួកគេបានជិះរថយន្តក្រុងបន្តទៅទីក្រុងហូជីមិញ និងបានទៅទស្សនាវត្ត Giac Vien ស្ថិតនៅចំងាយ៥គីឡូម៉ែត្រពីទីក្រុងជាវត្តដែលជាទីមនោរម្យ និងមានប្រវត្តិជាយូរលង់មកហើយ និងទស្សនាកំសាន្តទីផ្សារចំណាស់ Ben Thanh ដែលមានលក់ផលិតផលវៀតណាមច្រើនប្រភេទ។

ពួកគេបានជិះយន្តហោះដើម្បីត្រឡប់ទៅទីក្រុងហាណូយវិញ ធាតុអាកាសនៅទីក្រុងនេះបានផ្លាស់ប្តូរពី៣៥ទៅ២៥អង្សាររវាងទីក្រុងហូជីមិញ និងហាណូយ រួចធ្លាក់ដល់១៤អង្សានាពេលយប់។ ថ្ងៃនេះមានការណាត់ជួបនៅការិយាល័យរបស់អ្នកស្រី Agnes David ដែលជាតំណាងស្ថានកុងស៊ុលរបស់ប្រទេសបារាំងប្រចាំនៅប្រទេសវៀតណាម ដើម្បីទទួលនូវលិខិតអនុញ្ញាតក្នុងការធ្វើចរាចរណ៍ដោយស្របច្បាប់។

ពួកគេក៏បានធ្វើដំណើរបន្តទៅខេត្ត Lang Son ដែលនៅជិតព្រំប្រទល់វៀតណាមដើម្បីបំពេញនូវឯកសារ ថ្ងៃនេះសប្បាយរីករាយណាស់ដែលបានឃើញរថយន្តចតនៅកន្លែងភ្នាក់ងារគយ និងបានត្រួតពិនិត្យមើលម៉ាស៊ីនឡើងវិញប៉ុន្តែអ្វីៗនៅល្អដូចដើម



ក្រៅពីប្រឡាក់ធូលី ភ្នាក់ងារគយបានប្រគល់ឯកសារមកឱ្យបំពេញដោយទឹកមុខញញឹម និងទាមទារឱ្យចំណាយ២០០០ដុង សំរាប់ការិយាល័យសុខភាព។ ពួកគេបានចាកចេញពីខេត្តនេះដើម្បីត្រឡប់ទៅហាណូយវិញដោយរួសរាន់ និងបានស្វែងរកអ្នកបើកបររថយន្តជាជនជាតិវៀតណាមបន្ថែមទៀត ពីព្រោះនៅប្រទេសនេះមិនអនុញ្ញាតឱ្យអ្នកទេសចរណ៍បើកបរដោយខ្លួនឯងបានឡើយ ហើយពេលនេះបានបន្ថែមសមាជិកពីរនាក់ទៀតគឺ Dominique និង Dung ដែលបានសហការក្នុងការបើកបរឆ្ពោះទៅខេត្ត Ninh Binh។ មកដល់ទីនេះនៅវេលាម៉ោងបួនអ្នកទាំងអស់គ្នាក៏សំរេចចិត្តជិះទូកកំសាន្តនៅទន្លេ Tam Coc ដោយចំណាយពេលអស់បីម៉ោងដើម្បីមើលទេសភាពនៅតាមដងទន្លេ អ្នកចែវទូកមានភាពរាក់ទាក់យ៉ាងខ្លាំងទោះបីមេឃងងឹតបន្តិចក៏ដោយ គាត់មានឆន្ទៈបង្ហាញអ្នកទេសចរណ៍ឱ្យឃើញនូវរូងភ្នំចំនួនបី និងជីវិតអ្នករស់នៅតាមដងទន្លេ និងទឹកដីដែលសំបូរទៅដោយភ្នំ អ្នកនេសាទត្រី និងទូកអ្នកលក់បន្លែផ្លែឈើបណ្តែតលើផ្ទៃទឹក ក្រោមពន្លឺពណ៌មាសព្រិចៗនៃព្រះអាទិត្យជិតអស្តង្គត។ ការបើកបរបានបន្តអស់រយៈពេល១២ម៉ោងពីខេត្ត Ninh Binh ឆ្ពោះទៅខេត្ត Hue ដោយគ្មានបង្អង់ល្បឿនធ្វើឱ្យអ្នកទាំងអស់គ្នាមានការហត់ និងអស់កម្លាំងយ៉ាងខ្លាំង។

(មានតលេខក្រោយទៀត)



អូរីលីវ និង ស៊ីវយ៉ា



